# ខ្មែរប៉ុស្តិ៍

ភូមិភាគខាងកើត

THE KHMER POST

EAST COAST

The Cambodian-American Biweekly News

Email : Khmerpostusa@gmail.com

Call : (267) 253-3947

VOLUME 04 ISSUE 63 July 16th - 29th 2010


## មាតិការឿង ទំព័រ



## ព្យូហ៍យាត្រាថ្ងៃ ៤កក្កដា អតីតយុទ្ធជនខ្មែរដង្ហែក្បួន

**ហ្វីឡាដែលហ្វៀ** : អតីតយុទ្ធជនបានចូលរួមព្យូហ៍យាត្រាជាមួយអតីតយុទ្ធជនអាមេរិក ជាលើកដំបូងនៅហ្វីឡាដែលហ្វៀ កាលពីថ្ងៃទី៤ ខែកក្កដា ថ្ងៃបុណ្យឯករាជ្យជាតិអាមេរិកាំងកន្លងទៅនេះ ។




អតីតយុទ្ធជនខ្មែរ ដែលមានវ័យច្រើនបន្តិច ហើយបានខិតខំឆ្លៀតឱកាសដ៏ពិសេសនេះ មកបង្ហាញវត្តមានខ្លួន ហើយរំលឹកពីអតីតកាលដ៏អង់អាចក្លាហាន ហ៊ានបូជាជីវិតការពារមាតុប្រទេស ដើម្បីឱ្យប្រជាជាតិរស់នៅបានដោយសុវត្ថិភាព ។

នៅហ្វីឡាដែលហ្វៀ អតីតយុទ្ធជនខ្មែរ មានចែកជាពីរក្រុមដាច់គ្នា គឺក្រុម "អតីតយុទ្ធជនស្ម័គ្រចិត្តមួយ ដឹកនាំដោយលោក ថាច់ មារិន នឹងក្រុមអតីតយុទ្ធជនខ្មែរ ដឹកនាំដោយលោក រិទ្ធ ប៉ែន ជាមួយក្រុមទាំងពីរនោះ គេសង្កេតឃើញអតីតយោធាខ្មែរ អាចស្លៀកឯកសណ្ឋានកងទ័ពបានយ៉ាងសង្ហា ហើយទទួលបានន្ទុរស័កដដែល ឬដំឡើងយ៉ាងខ្ពស់ក៏បាន ។

កាលបុណ្យឯករាជ្យអាមេរិកាំងនេះ សហគមន៍អតីតយោធាខ្មែរ (តទៅទំព័រទី ០៨)

## តំណាងរាស្ត្រខ្មែរ មូរ សុខហួរ ទទួលការដាក់ទោស?

**ខ្មែរប៉ុស្តិ៍** : តំណាងរាស្ត្រខ្មែរ មូរ សុខហួរ និយាយប្រាប់វិទ្យុសំឡេង ស.រ.អា ថា លោកស្រីសុខចិត្តជាប់គុកជាជាងបង់ជម្ងឺចិត្តឱ្យលោកនាយករដ្ឋមន្ត្រីខ្មែរ ហ៊ុន សែន ចំនួន $4,000 នេះជាបទបញ្ជារបស់តុលាការចុងក្រោយបង្អស់ដាក់កំណត់ថ្ងៃទី១៥ ខែកក្កដា នេះជាថ្ងៃចុងក្រោយសម្រាប់បង់ជម្ងឺចិត្តជូនដើមចោទ ហ៊ុន សែន ។



ការដាក់ទោសរបស់តុលាការខ្មែរនេះ ធ្វើឡើងបន្ទាប់ពីលោក ហ៊ុន សែន ធ្វើសុន្ទរកថា ជាសាធារណៈនិយាយហៅលោកស្រី មូរ សុខហួរ របៀបដៀមដាមថាជា "ជើងខ្លាំង" ហើយពាក្យនេះ បានត្រូវលោកស្រី មូរ សុខហួរ ប្តឹងលោក ហ៊ុន សែន ពីបទបរិហាកេរ្តិ៍ តែការប្តឹងនេះបានត្រូវលោក ហ៊ុន សែន ប្តឹងតបវិញ ពីបទបរិហាកេរ្តិ៍ដូចគ្នា ដោយនិយាយថា "លោកស្រី មូរ សុខហួរ បានរើសពាក្យជើងខ្លាំង ទៅដាក់ខ្លួនដោយខ្លួនឯង" ។ ដោយសារលោក ហ៊ុន សែន មានអំណាចផ្តាច់មុខ លោកស្រី មូរ សុខហួរ ក៏ត្រូវសភាដកអភ័យឯកសិទ្ធិពីភាពជាតំណាងរាស្ត្រ ហើយអាចនឹងមានទោសជាប់ពន្ធនាគារគ្រប់ពេលវេលា ។

លោកស្រី មូរ សុខហួរ បន្តថា "ខ្ញុំពុំបានធ្វើអំពើឧក្រិដ្ឋណាមួយទេ -វិចារណញ្ញាណរបស់ខ្ញុំប្រាប់ថាខ្ញុំត្រូវឈប់រស់នៅក្នុងការភ័យខ្លាចតទៅទៀត ភ័យខ្លាចចំពោះបុរសខ្វាក់ (តទៅទំព័រទី ០៣)

## ប្រធានសាខាបក្សភ្លើងទានទៅ PA ច្រានចោលនូវសំដីថា លោកចុះចូលនឹងបក្សទេវតាចាច់ផ្កា

ដោយ : អ៊ឹមលឿម



•••មានព័ត៌មានដ៏រសើបមួយ បានលេចចេញពីមជ្ឈមណ្ឌលអ្នកតាមដានព្រឹត្តិការណ៍សង្គម និងព្រឹត្តិការណ៍នយោបាយក្នុងសហគមន៍ខ្មែរ នៅទីក្រុងហ្វីឡាដែលហ្វៀ ថាប្រធានសាខាគណបក្ស សម រង្ស៊ី ប្រចាំរដ្ឋផែនស៊ីវ៉េនៀវ៉ា (PA) (តទៅទំព័រទី ០៣)

## ក្រុមជំរឿននៅបន្តនៅឡើយ

**ហ្វីឡាដែលហ្វៀ** : ក្រុមជំរឿនប្រជាពលរដ្ឋ CENSUS នាព្រឹកថ្ងៃអាទិត្យ ទី១១ ខែមិថុនា នេះ បានធ្វើការឃោសនាជាបន្តនៅឡើយ នៅវត្តព្រះពុទ្ធរង្សី ចំពេលដែលពុទ្ធបរិស័ទវត្តនេះធ្វើបុណ្យផ្កាដ៏ឱឡារិកមួយដើម្បីកសាងវត្តជាបន្ត ។

ប្រជាពលរដ្ឋខ្មែរប្រមាណ ៣-៤០០នាក់ ក្នុងទឹកមុខរីករាយ សំលៀកបំពាក់ប្រពៃណីស្រស់ស្អាតរៀងៗខ្លួន (តទៅទំព័រទី ១៤)



United States Census 2010



សមាគមខ្មែរតំបន់ហ្វីឡាដែលហ្វៀ

CAMBODIAN ASSOCIATION OF GREATER PHILADELPHIA, INC

# សូមកុំឱ្យជំរឿនឆ្នាំ 2010 ឆ្លងផុតដោយគ្មានលោកអ្នក





## លោកអ្នកនៅមានពេលរហូតដល់ថ្ងៃទី៣០ ខែកក្កដា សំរាប់ជួយសហគមន៍យើង

បើមនុស្សគ្រប់រូបបានត្រូវរាប់ចំនួន អាចមានន័យថា លុយរាប់ពាន់ដុល្លារសម្រាប់អ្នកជិតខាង និងសហគមន៍-កម្មវិធីនិងសេវាកម្មយ៉ាងច្រើន ។

ជំរឿនប្រជាជន គឺសម្រាប់ទាំងអស់គ្នា ហើយពុំមានសំនួរពីស្ថានភាពជាអន្តោប្រវេសន៏ ។ ពីចំនួនប្រាក់ចំណូល, ពីលេខ "សូសូល"របស់លោកអ្នកនោះទេ ។ ទាំងនោះជាការសំងាត់ និងមិនអាចឱ្យដឹងបាន ទោះជាមន្ត្រីអន្តោប្រវេសន៏ ឬប្រធានាធិបតីក៏ដោយ ពុំអាចចូលទៅយកព័ត៌មានផ្ទាល់ខ្លួនរបស់អ្នកបានឡើយ ។

សូមលោកអ្នកអញ្ជើញមកសមាគមខ្មែរ នៅហ្វីឡាដែលហ្វៀ ដើម្បីឱ្យគេរាប់ឈ្មោះនៅ :

**5412 North 5th Street**
**Philadelphia, PA 19120-2802**
**Phone: 1-215-324-4070**

ឬក៏បញ្ជូនព័ត៌មានជំរឿនតាមទូរស័ព្ទរហូតដល់ថ្ងៃទី៣០ ខែកក្កដា ខាងមុខទៅការិយាល័យជំរឿនតាមលេខទូរស័ព្ទនៃភាសានីមួយៗ

| | | | |
|---|---|---|---|
| **English** | **: 1-866-872-6868** | **Korean** | **: 1-866-955-2010** |
| **Chinese** | **: 1-866-935-2010** | **Vietnamese** | **: 1-866-945-2010** |

សហព័ន្ធ ASIAN AMERICAN FEDERATION ជាដៃគូរដ៏ប្រសើររបស់សមាគមខ្មែរ ប្រចាំហ្វីឡាដែលហ្វៀ នៅក្នុងកិច្ចប្រឹងប្រែងលើកដំកើងការយល់ដឹង និងចូលរួមក្នុងជំរឿនឆ្នាំ២០១០ ។ បន្ថែមពីនេះទៅទៀត បេសកកម្មរបស់សហព័ន្ធ ASIAN AMERICAN FEDERATION គឺជំរុញឱ្យមានសម្លេងពលរដ្ឋ និងផាសុខភាពអ៊ាសាន-អាមេរិកាំង ។ យើងសហការណ៏គ្នាលើកដំកើងការស្រឡាញ់រាប់អានគ្នាទៅវិញទៅមកក្នុងសហគមន៏, ធ្វើការស្រាវជ្រាវ ដើម្បីឱ្យយោបល់ទៅអ្នកនយោបាយ ហើយផ្ដល់ការគាំទ្រទៅអង្គការ, សេវាកម្មរបស់សហគមន៏ ។ បើចង់បានព័ត៌មានបន្ថែម សូមចូលទៅគេហទំព័រ www. aafederation.org



Asian American Federation

តមកពីទំព័រទី ០១

## ប្រធានសាខាបក្សភ្លើងទាននៅ PA...

បានចុះចូលជាមួយគណបក្សប្រជាជនកម្ពុជា ដែល ដំណឹងនេះបានធ្លាយ ជាព័ត៌មានដ៏ក្តៅគគុក និងមាន ការចាប់អារម្មណ៍គួបផ្សំនឹងការងឿងឆ្ងល់យ៉ាងខ្លាំង សម្រាប់ក្រុមអ្នកជាតិនិយម ដែលស្រឡាញ់នូវលទ្ធិប្រជាធិបតេយ្យពិតប្រាកដមួយ ។

ព្យុះព័ត៌មានដ៏ចម្លែកនេះ ត្រូវបានលេចឮឡើង ដោយចេញពីមាត់មួយទៅមាត់មួយ ក្នុងរយៈពេល ប្រមាណជាពីរខែចុងក្រោយនេះ បន្ទាប់ពីប្រធាន សាខាបក្សប្រឆាំងរូបនោះ ត្រូវគេសង្ស័យថា មាន ទំនាក់ទំនងអ្វីម្យ៉ាងជាមួយនឹងឥស្សរជន និងសកម្មជនរបស់គណបក្សប្រជាជនកម្ពុជា ប៉ុន្តែរាល់ទំនាក់ ទំនងទាំងនោះ ត្រូវបានប្រធានសាខាបក្សជំទាស់ រូបនោះបកស្រាយថា នេះជាការទំនាក់ទំនងបែប មិត្តភាពធម្មតាក្នុងនាមជាខ្មែរដូចគ្នាតែប៉ុណ្ណោះ ។

ឆ្លើយតបចំពោះដំណឹងអកុសលបែបនេះ លោក មាស ជា ដែលទទួលរងនូវការចោទប្រកាន់ខាងលើ ហើយជារឿយៗ តែងតែប្រើភាសាក្នុងការវាយ សំពងរដ្ឋាភិបាលរបស់លោក ហ៊ុន សែន យ៉ាងចាស់ ដៃនោះ បានឱ្យ "ខ្មែរប៉ុស្តិ៍" ដឹងថា : លោកគ្មានថ្ងៃ ដើរចោលពីបក្សរបស់លោកទេ ហើយបែរទៅបំរើ គណបក្សប្រជាជនកម្ពុជា ដែលជាគណបក្សកុម្មុយនីស្ត ដូចព័ត៌មានចចាមអារាមនោះឡើយ ។ លោក បានបន្តថា : គណបក្សប្រជាជនកម្ពុជា ពុំមែនជាជំរើសសម្រាប់រូបលោកទេ ហើយបច្ចុប្បន្នលោកក៏ មិនទទួលប្រាក់ខែពីបក្សដែលកំពុងមានឈ្មោះស្អុយ រលួយនេះឡើយដែរ តែផ្ទុយទៅវិញ គឺបានប្រាក់ខែ ដោយការធ្វើការយ៉ាងស្របច្បាប់របស់លោកវិញទេ។

លោក មាស ជា បានប្រើភាសាធ្ងន់ៗ ឆ្លើយតប នឹងការមន្ទិល ដែលថាលោកចុះចូលទៅបំរើគណបក្ស ដែលកំពុងក្តោបអំណាចយ៉ាងចាស់វស្សាថា : "ក្នុង នាមជាកូនខ្មែរ ដែលកើតចេញពីឈាមជ័រអ្នកស្នេហាជាតិ គឺពិតជាពុំអាចក្បត់នូវឧត្តមគតិរបស់ខ្លួនឡើយ ហើយជាពិសេស គឺនៅចងចាំបណ្តាំរបស់ឪពុក បាន ផ្តាំមិនឱ្យមានការពាក់ព័ន្ធជាមួយបក្សកុម្មុយនីស្ត ឡើយ ពីព្រោះពួកកុម្មុយនីស្ត បានធ្វើឱ្យប្រជាជាតិ ទាំងមូលធ្លាក់ក្នុងរណ្តៅគ្រោះថ្នាក់យ៉ាងខ្លាំង"។

ស្របគ្រាដំណាលគ្នានោះផងដែរ លោក ជា ក៏ បានសារភាពដោយត្រង់ៗថា : លោកពិតជាមាន ទំនាក់ទំនងជាមួយឥស្សរជន និងសកម្មជនរបស់ គណបក្សប្រជាជនកម្ពុជាមែន តែរាល់ការទំនាក់ ទំនងទាំងនោះ គ្មានអ្វីក្រៅពីការរាប់អានគ្នាបែប មិត្តភាព, បងប្អូន... ហើយម្យ៉ាងទៀត ក្នុងនាមជា អ្នករកស៊ីផងនោះ គឺត្រូវមានទំនាក់ទំនងល្អជាមួយ អតិថិជនគ្រប់មជ្ឈដ្ឋានទាំងអស់ ។ នោះជាការ បញ្ជាក់របស់ប្រធានសាខាបក្សជំទាស់ប្រចាំនៅរដ្ឋ ផែនស៊ីវេនៀរ ។

ប្រធានសាខាបក្សប្រឆាំងរូបនោះ ក៏បានឆ្លៀត ឱកាសរិះគន់ និងស្តីបន្ទោសដល់អ្នកនយោបាយខ្មែរ បច្ចុប្បន្នមួយចំនួន ដែលមើលឃើញតែផលប្រយោជន៍ផ្ទាល់ខ្លួនជាចម្បង ដោយពុំបានគិតអំពីផល ប្រយោជន៍រួមរបស់ប្រទេសជាតិឡើយ ។ លោក បន្តការរិះគន់ថា "មានអ្នកនយោបាយខ្លះ បានរិះគន់ រដ្ឋាភិបាលយ៉ាងចាស់ដៃ ប៉ុន្តែទីបំផុត បែរជាចុះចូល ជាមួយគេវិញ ព្រោះតែសម្លឹងឃើញបុណ្យស័ក្តិ និង មុខនាទីបន្តិចបន្តួចក្នុងរដ្ឋាភិបាល"។ លោកបន្តការ រិះគន់ដោយនិយាយចំឈ្មោះអ្នកនយោបាយខ្មែរ ចិត្តរ៉េស្វែងរកលាភម្នាក់ថា "ខ្ញុំមិនដូចលោក កែវ រ៉េមី ដែលពូកែនិយាយកោកៗ តែមាត់ ហើយទីបំផុត បែរជាទៅចូលជាមួយពួកកុម្មុយនីស្ត ព្រោះតែមាន មុខតំណែងបន្តិចបន្តួចនោះឡើយ"។

ជាទូទៅ ប្រពៃណីនៃការផ្លាស់ប្តូរបក្សនយោបាយ អ្នកតាំងខ្លួនថា ជាអ្នកប្រជាធិបតេយ្យ, អ្នក ស្រឡាញ់ជាតិ, អ្នកស្អប់ខ្ពើមអំពើពុករលួយ, ស៊ី សំណូកសូកប៉ាន់... ត្រូវបានកើតឡើងជាហូរហែឥត ដាច់។ គេកម្រឃើញសកម្មជនរបស់គណបក្ស កំពុងកាន់អំណាចយ៉ាងចាស់វស្សា ដែលដឹកនាំដោយ លោក ហ៊ុន សែន ដើរចេញពីបក្សរបស់ខ្លួន ដែល ធ្លាប់បានស៊ីចុកសើមបបូរមាត់ និងមានជីវភាពធូរធា ទៅចុះចូលជាមួយបក្សប្រឆាំងនានា ដែលជាបក្ស ខំស្រែកក្តែងៗ ថាស្រឡាញ់ជាតិ, ស្រឡាញ់លទ្ធិប្រជាធិបតេយ្យ... នោះឡើយ ។

ក្រៅពីអ្នកនយោបាយហើយនោះ ក៏នៅមាន អ្នកវិនិយោគយ៉ាងសន្ធឹកសន្ធាប់ដោយរាប់ទាំងអ្នក កាសែតប្រឆាំងផងដែរ ក៏ត្រូវបានបែរខ្នងទៅឱប ចង្កេះរដ្ឋាភិបាលយ៉ាងស្អិត ប្រយោជន៍ស្វែងរកខ្នង បង្អែកក្នុងការរកស៊ី និងប្រាថ្នាចង់បានមុខមាត់គ្រាន់ បង្គួតគេឯង ។ គេនៅចងចាំនូវអតីតកាលនៃកាសែត ប្រឆាំងមួយ ដែលស្ថិតទៅខាងបក្ស សម រង្ស៊ី ។ កាសែតនេះ ក៏ធ្លាប់រិះគន់រដ្ឋាភិបាលយ៉ាងចាស់ដៃ និងឥតសំចៃមាត់ មិនយូរប៉ុន្មាន ចាងហ្វាងកាសែត នេះត្រូវបានប្តូរឥរិយាបថពីប្រឆាំងទៅជាគាំទ្រ រដ្ឋាភិបាលយ៉ាងចម្លែកបំផុត ។ បច្ចុប្បន្នចាងហ្វាង រូបនោះ ត្រូវបានរដ្ឋាភិបាលផ្តល់នូវតួនាទីដល់សំខាន់ មួយ ជាអគ្គកុងស៊ុលខ្មែរ ប្រចាំទីក្រុងមួយ ដែល មានប្រជាពលរដ្ឋខ្មែរច្រើនលំដាប់ទីពីរក្នុងសហរដ្ឋ អាមេរិក ។

រីឯបុរសខ្មែរ-អាមេរិកាំង កែវ រ៉េមី ជាអ្នក នយោបាយធ្លាប់ផ្លាស់ប្តូរបក្ស ដូចជាប្តូរសម្លៀក បំពាក់ និងអតីតជាឥស្សរជនដ៏សំខាន់ម្នាក់របស់ គណបក្សសិទ្ធិមនុស្ស ក៏ត្រូវបានដើរចេញពីបក្សដ៏ ក្មេងខ្ចីរបស់ខ្លួន បន្ទាប់ពីធ្លាប់បានវាយប្រហារតាម ពាក្យសម្តីទៅលើរដ្ឋាភិបាលយ៉ាងចាស់ដៃហើយ នោះ ។ ការដើរចេញពីបក្សរបស់ កែវ រ៉េមី ពុំមែន បណ្តាលមកពីបញ្ហាផ្ទៃក្នុងឡើយ តែផ្ទុយទៅវិញ ព្រោះបក្សសិទ្ធិមនុស្ស ពុំបានផ្តល់នូវមុខតំណែង ឬ បុណ្យស័ក្តិសម្រាប់រូបឡើយ ។ ក្នុងកិច្ចមួយជាមួយ អ្នកកាសែតនាកាលកន្លងមក លោក កែវ រ៉េមី បាន និយាយថា : លោកមានការហត់នឿយក្នុងការ ប្រឆាំងជាមួយនឹងរដ្ឋាភិបាលខ្លាំងណាស់ ដូច្នេះ គាត់ ឈប់ប្រឆាំងទៀតហើយ ហើយចូលរួមជាមួយនឹង រដ្ឋាភិបាលវិញ Sic...។

បច្ចុប្បន្ន កែវ រ៉េមី មានមុខមាត់គួរសមក្នុង រដ្ឋាភិបាល ដែលលោកធ្លាប់បានវាយប្រហារ ហើយ ថ្មីៗនេះ ឈ្មោះរបស់លោកក៏ស្ថិតនៅក្នុងបញ្ជីរបស់ សមាជិកនៃអង្គការកំចាត់អំពើពុករលួយ ដែលរដ្ឋាភិបាល ទើបតែបង្កើតឡើងបន្ទាប់ពីច្បាប់នេះបានជាប់ គាំងអស់ជាច្រើនឆ្នាំហើយនោះ ។ ក៏ប៉ុន្តែក៏នៅមាន អ្នកនយោបាយឃ្លីងឃ្លោងមួយចំនួនធ្លាប់បាននិយាយ ក្នុងលក្ខណ៍មិនបង្ហាញអត្តសញ្ញាណថា : ការចុះចូល ជាមួយរដ្ឋាភិបាល គឺគ្រាន់តែសម្រាប់រកខ្នងបង្អែក, តួនាទី, បុណ្យស័ក្តិ... តែប៉ុណ្ណោះ ក៏ប៉ុន្តែមនសិការជាតិ របស់ពួកគេពុំមានថ្ងៃប្រែប្រួលនោះឡើយ... ៕



តមកទំព័រទី០១

## តំណាងរាស្ត្រខ្មែរ មូរ សុខហួរ...

ដែលត្រួតត្រាលើកម្ពុជាជាង៣០ឆ្នាំ" លោកស្រីបន្ថែម ថា "នេះគឺជារឿងការពារនារីភេទ បើខ្ញុំទុកឱ្យវានៅ អញ្ចឹងហើយបង់ជម្ងឺចិត្ត តើមានន័យអ្វីទៅដែលស្ត្រី នៅកម្ពុជា មានដល់ទៅជាង៥០%នៃប្រជាពលរដ្ឋខ្មែរ នោះ" ។ លោកស្រី មូរ សុខហួរ បានពន្យល់ថា "ស្ថានភាពស្រីខ្មែរ បានទទួលពន្លឺខ្លះហើយដែរ ក៏ប៉ុន្តែពុំបាន ក្លាយទៅជាស្ថាប័នឡើយទេ" លោកស្រីចង់បង្ហាញ ស្ថានភាពពិតប្រាកដរបស់ស្ត្រីខ្មែរ ដល់ពិភពលោក តាមរយៈការជាប់ពន្ធនាគាររបស់តំណាងរាស្ត្រស្ត្រីម្នាក់ នៅពេលនេះ។

ជំនួយពិភពលោកចង់ឃើញកម្ពុជាវិវត្តន៍ទៅរក ការគោរពសិទ្ធមនុស្សយ៉ាងពេញលេញ ក៏ប៉ុន្តែនៅថ្ងៃ ដែលធនាគារពិភពលោកផ្តល់ជំនួយ១ពាន់លានដុល្លារ ឱ្យខ្មែរនាខែមិថុនា មុននោះ តុលាការកំពូលខ្មែរបាន ឱ្យលោក ហ៊ុន សែន ឈ្នះករណីប្តឹង មូរ សុខហួរ នា ថ្ងៃដដែលនោះ ៕

# តើ កឹម សុខា ជាតួឯកនយោបាយថ្មីក្នុងខណៈដែល ហ៊ុន សែន កំពុងបិទច្រកនយោបាយ សម រង្ស៊ី ? (តមកពីលេខមុន)

**•របត់នយោបាយនៅក្រោយព្រឹត្តិការណ៍បោះឆ្នោតសភា ខែកក្កដា ឆ្នាំ2008**

នៅក្រោយការបោះឆ្នោតគណបក្សបួន គឺគណបក្ស សម រង្ស៊ី, សិទ្ធិមនុស្ស, នរោត្តម រណប្ញទ្ធិ និង ហ៊្វុនស៊ិនប៉ិច បានប្រកាសមិនទទួលមិនទទួលស្គាល់លទ្ធផលបោះឆ្នោតដោយបានចោទប្រកាន់ថា គណបក្សប្រជាជនកម្ពុជាបានលួចបន្លំសន្លឹកឆ្នោត ។ គណបក្សទាំងបួនបានប្រកាសចងសម្ព័ន្ធភាពដើម្បីប្រឆាំងនឹងលទ្ធផលបោះឆ្នោត និងទាមទារឱ្យមានការបោះឆ្នោតឡើងវិញ ។

គណបក្សប្រជាជនកម្ពុជាមិនព្រមលះបង់ជ័យជំនះរបស់ខ្លួនទៅឱ្យគណបក្សប្រឆាំង ហើយបន្ទន់ឥរិយាបថតាមការទាមទារគណបក្សប្រឆាំងដើម្បីរៀបចំការបោះឆ្នោតឡើងវិញនោះទេ ។

អ្នកវិភាគនយោបាយយល់ឃើញថា ការប្រកាសរួបរួមគ្នានៅក្រោយការបោះឆ្នោតគ្រាន់តែជាល្បែងនយោបាយរបស់អ្នកនយោបាយប្រឆាំង ដើម្បីលុបលាងភាពអាម៉ាស់នៃបរាជ័យរបស់ពួកគេតែប៉ុណ្ណោះ ។ បើដឹងថា គង់តែមានថ្ងៃនេះដដែលហេតុអ្វីគណបក្សរាជានិយម និង គណបក្សប្រជាធិបតេយ្យទាំងអស់ម្តេចមិនព្រមរួបរួមគ្នានៅមុនពេលបោះឆ្នោត ។

ការចាប់ដៃគ្នារវាងគណបក្សទាំងបួនមិនមានអាយុយូរអង្វែងឡើយ ។ គណបក្សហ៊្វុនស៊ិនប៉ិចបានដកខ្លួនចេញពីសម្ព័ន្ធភាពមុនគេបន្ទាប់ពី ហ៊ុន សែន យល់ព្រមទទួលយកហ៊្វុនស៊ិនប៉ិចចូលរួមនៅក្នុងរដ្ឋាភិបាលចម្រុះ។ បន្ទាប់មកគណបក្សនរោត្តម រណប្ញទ្ធិ បានដកខ្លួនចេញពីសម្ព័ន្ធភាពទៀត បន្ទាប់ពី ហ៊ុន សែន បានយល់ព្រមផ្តល់ផ្លូវនយោបាយដល់ស្តេច ក្រុមព្រះ នរោត្តម រណប្ញទ្ធិ ។

លោក សម រង្ស៊ី

លោក កឹម សុខា

ចុងក្រោយសម្ព័ន្ធភាពនៅសល់តែគណបក្ស សម រង្ស៊ី និងគណបក្សសិទ្ធិមនុស្សប៉ុណ្ណោះ។ គណបក្សទាំងពីរបានបន្តស៊ូមតិប្រឆាំងនឹងលទ្ធផលបោះឆ្នោត ប៉ុន្តែរហូតមកដល់ពេលនេះ មិនបានទទួលលទ្ធផលអ្វីឡើយ។

គណបក្ស សម រង្ស៊ី និងគណបក្សសិទ្ធិមនុស្សបានអនុម័តនូវគោលជំហរផ្លូវការធ្វើពហិការមិនចូលរួមប្រជុំសភាលើកដំបូងក្រោមព្រះរាជាធិបតីភាពនៃព្រះមហាក្សត្រ ។ សម រង្ស៊ី បានប្រកាសឱ្យដឹងមុនការបោះឆ្នោតថា គណបក្សសមរង្ស៊ី នឹងមិនចូលរួមប្រជុំសភាដើម្បីផ្តល់សុពលភាពឱ្យតំណាងរាស្ត្រយួនឡើយ ប៉ុន្តែក្រោយមក សម រង្ស៊ី និងគណបក្សរបស់គាត់បានក្បត់ពាក្យសន្យារួមគ្នាជាមួយ កឹម សុខា និងគណបក្សសិទ្ធិមនុស្ស ដោយបានសម្រេចចូលរួមប្រជុំសភាយ៉ាងតក់ក្រហល់ ។ កឹម សុខា មិនត្រូវបានប្រាប់ឱ្យដឹងមុនអំពីការសម្រេចនេះឡើយ ហើយទោះបី កឹម សុខា និងតំណាងរាស្ត្រ 2រូប ទៀតរបស់គាត់ចង់ចូលរួមប្រជុំក៏ដោយក៏ចូលមិនទាន់ដែរ ព្រោះពេលវេលាប្រថុចញ៉ុចខ្លាំងពេកទៅហើយ ។

ទាមទារឱ្យដឹង សម រង្ស៊ី បានសម្រេចចូលប្រជុំរដ្ឋសភាជាថ្នូរនឹងការផ្តល់សម្បទានពីសំណាក់ ហ៊ុន សែន ក្នុងការធ្វើវិសោធនកម្មលើបទបញ្ជាផ្ទៃក្នុងរដ្ឋសភា ដើម្បីទទួលស្គាល់តួនាទីផ្លូវការរបស់គណបក្សជំទាស់ និងការទទួលបានសមាសភាពមួយចំនួននៅក្នុងគណៈកម្មការជំនាញរដ្ឋសភាទាំងប្រាំបួន ប៉ុន្តែនៅចុងបញ្ចប់ សម រង្ស៊ី បានចាញ់បោក ហ៊ុន សែន ។ ហ៊ុន សែន បានប្រកាសនៅក្រោយកិច្ចប្រជុំរដ្ឋសភាថា ការសម្រេចចិត្តរបស់ សម រង្ស៊ី ហាក់ដូចជាយឺត ពេលបន្តិច ដូច្នេះសមាសភាពនៃគណបក្ស សម រង្ស៊ី នៅក្នុងគណៈកម្មការជំនាញរដ្ឋសភាទាំងប្រាំបួនមិនត្រូវបានដាក់បញ្ចូលឡើយ ។ ហ៊ុន សែន បានយល់ព្រមធ្វើវិសោធនកម្មលើបទបញ្ជាផ្ទៃក្នុងរដ្ឋសភា ដើម្បីដាក់បញ្ចូលការទទួលស្គាល់តួនាទីរបស់គណបក្សប្រឆាំង ប៉ុន្តែការទាមទារឱ្យមានកញ្ចប់ថវិកាសម្រាប់គណបក្សប្រឆាំង និងលក្ខខណ្ឌមួយចំនួនដែល សម រង្ស៊ី ស្នើសុំដាក់បញ្ចូលដើម្បីធ្វើឱ្យមានលក្ខណៈដូចគ្នាទៅនឹងសភានៃប្រទេសអាឡឺម៉ង់ មិនត្រូវបានដាក់បញ្ចូលឡើយ ។ នេះជាកំហុសនយោបាយដ៏ធំ ដែល សម រង្ស៊ី បានធ្វើ ព្រោះត្រីរស់ក៏រួចទន្សាយក៏រួច។

ដោយសារមូលហេតុដ៏ចម្បងនេះ កឹម សុខា និងគណបក្សសិទ្ធិមនុស្សបានបាត់បង់ទំនុកចិត្តមួយចំនួនពី សម រង្ស៊ី ដែលធ្វើឱ្យប៉ះពាល់ដល់ដំណើរការបង្កើតសម្ព័ន្ធភាព និងការរួបរួមគ្នា។

នៅចុងឆ្នាំ2008 សម រង្ស៊ី បានប្រកាសផ្លាស់ប្តូរគោលជំហរនយោបាយពីការប្រឆាំងតវ៉ានៅតាមដងផ្លូវសាធារណៈមកជាការរិះគន់នៅក្នុងប្រព័ន្ធវិញ។ មានន័យថា គណបក្ស សម រង្ស៊ី ប្រើប្រាស់សមាសភាពរបស់ខ្លួនដែលមាននៅក្នុងក្របខណ្ឌក្រុមប្រឹក្សាឃុំ/សង្កាត់ក្រុម ប្រឹក្សាស្រុក/ខណ្ឌ ក្រុមប្រឹក្សាខេត្ត/ក្រុង និង រាជធានី ភូមិ ព្រមទាំងរដ្ឋសភា និងព្រឹទ្ធសភា។ ការផ្លាស់ប្តូរនៃគោលជំហរនយោបាយនេះបានបង្កើតឱ្យមានភាពភ្ញាក់ផ្អើលយ៉ាងខ្លាំងក្នុងចំណោមអ្នកនយោបាយប្រជាធិបតេយ្យមួយចំនួន និងសង្គមស៊ីវិល ព្រោះគោលជំហរនេះ គណបក្ស សម រង្ស៊ី បានប្រកាន់យកតាំងតែពីការចាប់បដិសន្ធិនៅឆ្នាំ 1995 ហើយគោលជំហរនេះបានជួយបង្កើតនូវប្រជាប្រិយភាព និងការគាំទ្រដល់គណបក្ស សម រង្ស៊ី ជាពិសេសក្នុងចំណោមកម្មកររោងចក្រកាត់ដេរ ។

ប៉ុន្តែសម្រាប់អ្នកវិភាគនយោបាយវិញបានបញ្ចេញទស្សនៈថា សម រង្ស៊ី បន្ទន់ឥរិយាបថនយោបាយដោយកាត់បន្ថយការរិះគន់មកលើ ហ៊ុន សែន និងគណបក្សប្រជាជនកម្ពុជា ដើម្បីស្វែងរកលាភសក្ការៈនយោបាយ និងដើម្បីបន្ធូរបន្ថយភាពតានតឹងផ្នែកនយោបាយដែលគណបក្ស សម រង្ស៊ី បានប្រឈមជាមួយ ហ៊ុន សែន ។ ក្នុងដំណាក់កាលនោះតំណាងរាស្ត្រនៃគណបក្ស សម រង្ស៊ី មួយចំនួនត្រូវបានជាប់បណ្តឹងបរិហារកេរ្តិ៍នៅក្នុងតុលាការ ។ តាមការឱ្យដឹង សម រង្ស៊ី បានសរសេរលិខិតទៅ ហ៊ុន សែន និង ហេង សំរិន ដើម្បីស្នើសុំបញ្ចូលសមាសភាពនៅក្នុងគណៈកម្មការជំនាញរដ្ឋសភា ប៉ុន្តែលិខិតរបស់គាត់ត្រូវបានមេដឹកនាំនៃគណបក្សប្រជាជនកម្ពុជាទាំងពីរបោះចូលធុងសម្រាម។

ចំណែក កឹម សុខា បានសម្តែងពីការមិនសប្បាយចិត្តចំពោះការសម្រេចចិត្តរបស់ សម រង្ស៊ី ក្នុងការផ្លាស់ប្តូរគោលជំហរនយោបាយ ។ កឹម សុខា បានប្រតិកម្មថាគោលជំហរនយោបាយរបស់គណបក្សសិទ្ធិមនុស្សនឹងមិនផ្លាស់ប្តូរតាមគណបក្ស សម រង្ស៊ី ឡើយ។

**•ការរួបរួមគ្នារវាងគណបក្សសមរង្ស៊ី និងគណបក្សសិទ្ធិមនុស្ស**

ទោះបីមានការក្បត់ពាក្យសន្យារួម និងការផ្លាស់ប្តូរគោលនយោបាយខ្លះៗក៏ដោយ ក៏គេសង្កេតឃើញថា គណបក្សទាំងពីរនៅតែមានឆន្ទៈលើបញ្ហារួបរួមគ្នាដដែល ។

គណបក្ស សម រង្ស៊ី និងគណបក្ស សិទ្ធិមនុស្ស បានធ្វើដំណើរជឿនលឿនទៅមុខមួយកំរិតដោយដាក់ចេញសេចក្តីប្រកាសរួម ដើម្បីបង្កើតឡើងនូវ **ចលនាប្រជាធិបតេយ្យ ដើម្បីការផ្លាស់ប្តូរ** ឬ Democratic Movement for Changes (DMC) កាលពីថ្ងៃទី15 ខែមករា ឆ្នាំ2009 ។

តាមរយៈចលនាប្រជាធិបតេយ្យដើម្បីការផ្លាស់ប្តូរ គណបក្សទាំងពីរបានសន្យារៀបចំបញ្ជីបេក្ខជនរួមគ្នាក្នុងការបោះឆ្នោតជ្រើសរើសសមាជិកក្រុមប្រឹក្សាឃុំ/សង្កាត់ឆ្នាំ 2012 និងការបោះឆ្នោតជ្រើសតាំងសមាជិកតំណាងរាស្ត្រឆ្នាំ2013 ។ ទោះជាយ៉ាងនេះក្តី គណបក្សទាំងពីរមិនទាន់បានបង្ហាញពីយន្តការ និងយុទ្ធសាស្ត្រពិស្តារ និងជាក់លាក់អំពីការរៀបចំបញ្ជីបេក្ខជនរួមគ្នាតាមរបៀបណានោះទេ ។ ថាតើគណបក្សទាំងពីរត្រូវកំណត់យកគោលការណ៍ស្មើភាព គឺ "50% ស្មើគ្នា" នៃបេក្ខជន និងរូបមន្តនៃការរៀបចំបញ្ជីតាមរបៀបឆ្លាស់គ្នា ឬយ៉ាងណានោះទេ ? តើគណបក្ស សម រង្ស៊ី យល់ព្រមផ្តល់ឱ្យគណបក្សសិទ្ធិមនុស្ស 50%នៃបេក្ខជន និងលំដាប់លេខរៀងល្អនៅលើបញ្ជីបេក្ខជនឬទេ ? តើគណបក្សសិទ្ធិមនុស្សព្រមទទួលការផ្តល់ឱ្យតិចជាង50% ឬទេ ? នេះជាបញ្ហាគន្លឹះយុទ្ធសាស្ត្រតម្រូវឱ្យមានឯកភាពនយោបាយ (political consensus) នៅក្នុងគណបក្សនីមួយ បើមិនដូច្នេះទេ នឹងបង្កើតឱ្យមានភាពថ្នាំងថ្នាក់ដែលអាចឈានដល់ការបែកបាក់ផ្ទៃក្នុង ។

(តទៅទំព័រទី ១៨)

# ប្រវត្តិព្រះអាចារ្យ "ហែម ចៀវ"

(តមកពីលេខមុន)



ដោយ : អ៊ឹម លឿម

•••លុះគ្រូអាចារ្យ ហែម ចៀវ ទៅដល់ស្រាប់តែលោក ទា សាន ប្រើឱ្យបំរើទៅទិញខោមួយ អាវមួយ ហើយបានបង្ខំលោកអាចារ្យ ហែម ចៀវ ឱ្យផ្លាស់ស្បង់ចីពរពីខ្លួន ហើយស្លៀកពាក់ខោអាវភ្លាម រួចបារាំងវានាំទៅតាមរថយន្តវាបាត់ទៅតែម្តង ដោយរកតែរត់ទៅប្រាប់អ្នកណាក៏មិនទាន់ ។ គិតទៅពួកគេចាប់ផ្សឹកទាំងឥតជំនុំសោះ ។

លោក ជុំ មួង កាន់តែភ័យខ្លាំងថា អញច្បាស់ជាបារាំងចាប់ខ្លួនទៀតជាពុំខាន ។ លុះដល់ពេលចេញពីធ្វើការ ក៏ទៅជំរាបដល់លោក សឺង ង៉ុកថាញ់ តាមដំណើររឿង ។ លោកក៏ប្រាប់ថា ឱ្យប្រយ័ត្នខ្លួនឱ្យមែនទែន បារាំងប្រាកដជាចាប់យើងហើយ ។ រឿងចាប់លោកគ្រូអាចារ្យ ហែម ចៀវ ក៏ផ្អើលឆោឡោឡើងក្នុងបណ្តាពួកលោកសង្ឃជានិស្សិតនៅសាលាបាលីជាន់ខ្ពស់ និងវត្តអារាមនានា ក្នុងទីក្រុងភ្នំពេញ ដែលជាច្រើនសុទ្ធតែជាមិត្តភក្តិ និងជាសិស្សរបស់លោក ។



ក្នុងពេលជាមួយគ្នានោះ លោក នួន ឌួង ក៏ត្រូវបានតិញបារាំង ទៅចាប់នៅឯផ្ទះដែរ ។ នៅពេលបារាំងចាប់ផ្សឹកលោកអាចារ្យ ហែម ចៀវ មានការឈឺចាប់ឥតឧបមា ធ្វើឱ្យទឹកនេត្រាលោកហូរដោយមិនដឹងខ្លួន ។ លោកទឹកតូចចិត្តនឹងខ្មែរគ្នាឯង ដែលបានធ្វើធំហើយ មិនជួយឈឺឆ្អាលការពារកិត្តិយសព្រះសង្ឃ បែរជាបណ្តោយឱ្យជនបរទេសញាំញីតាមអំពើចិត្តរបស់គេ ។ លោកគ្មានទឹកភ័យខ្លាចថា បារាំងធ្វើទារុណកម្មអ្វីទេ ដែលលោកទឹកស្តាយគម្រោងការណ៍ដែលនឹងជិតបានសម្រេចផលផ្តល់ទៅឱ្យរាស្ត្រខ្មែរ ដែលរស់ក្នុងទុក្ខ ក្រោមក្រញ៉ាំបិសាចបារាំងភ្នែកស និងខ្មែរយង់ឃ្នងជាច្រើនឆ្នាំមកហើយ ។

នៅក្នុងទីឃុំឃាំងលោកអាចារ្យ ហែម ចៀវ អង្គុយសម្លឹងតាមរន្ធតូចមួយ មើលទៅមេឃា ដែលមានដុំពពករសាត់គ្រឿន១ ប្រៀបបានជាដុំទុក្ខផុសចេញពីក្រអៅបេះដូងនៃប្រជាពលរដ្ឋរួមជាតិ ។ ព្រះអាចារ្យពោលម្នាក់ឯងទាំងទឹកភ្នែកស្រក់សស្រាក់ថា : ឱប្រទេសអញអើយ ! តើកាលណាទៅនឹងបានឯករាជ្យ សម្បូរសប្បាយដូចសម័យមហានគរវិញ ! បើមន្ត្រីធំ១សុទ្ធតែលក់ក្បាលដាច់ថ្លៃឱ្យបារាំងទៅហើយ... ។ តើពេលណាទើបខ្មែរយើងក្រោកពីដេក? ទើបខ្មែរស្គាល់ខ្លួនឯងជាមនុស្សដូចសាសន៍ដទៃ ! ឱប្រិយមិត្តដែលរួមថ្លើម ស៊ូប្តូរជីវិតឥតស្តាយស្រណោះ ដើម្បីគ្រលាស់ខ្លួនឱ្យរួចផុតពីនឹមអាណានិគមរបស់បារាំងសែស ! មិត្តមិនដឹងជាព្រួយយ៉ាងណាទេ ! ព្រោះខ្លាចបែកការណ៍ (ផែនការសម្ងាត់) របស់យើង! ទោះបីអាចោរអបលក្សណ៍ទាំងនោះយកអាវុធមកពុះទ្រូងរូងយកថ្លើមខ្ញុំក៏ដោយ ខ្ញុំមិនឆ្លើយប្រាប់នូវការពិតទាំងនោះឡើយ ! ខ្ញុំមិនសុខចិត្តឱ្យប្រទេសខ្ញុំស្លាប់ជាដាច់ខាត ហើយខ្ញុំមិនសុខចិត្តរស់ដោយឃើញប្រទេសខ្ញុំធ្លាក់ជាខ្ញុំកញ្ជះគេដែរ ។ ឱមិត្តរួមសាសនា ! ខ្ញុំសូមបួងសួងដល់គុណព្រះរតនត្រ័យ និងវិញ្ញាណក្ខន្ធនៃវីរបុរសខ្មែរ ដែលមានលោកក្រឡាហោមគង់ ជាដើម តាមជួយគាំពារឱ្យការតស៊ូរបស់យើងបានសម្រេចជោគជ័យកុំបីខាន ដើម្បីឱ្យកូនចៅរបស់យើងស្គាល់នូវសិទ្ធិសេរីភាព. យុត្តិធម៌. សុភមង្គលដូចអារ្យប្រទេសនានា... ។

ទំនួញដ៏សោកសៅនេះ បានហើរចូលក្នុងបេះដូងខ្មែរ អ្នកស្នេហាជាតិឱ្យរឹងរឹតតែក្លាហានឡើង១ជាលំដាប់ ។ សេចក្តីទុកលំបាករបស់លោក ដែលបារាំងបានធ្វើទារុណកម្មយ៉ាងព្រៃផ្សៃ ដើម្បីសួរចម្លើយនោះមានវិសាលភាពមិនអាចពណ៌នាបានឡើយ ។ រីឯលោក នួន ឌួង ធ្វើការនៅក្រុមជំនុំប្រែព្រះត្រៃបិដក ក៏ត្រូវទទួលនូវអំពើយង់ឃ្នងដូចព្រះអាចារ្យ ហែម ចៀវ ដែរ ។ តែវីរបុរសទាំងពីររូបនេះ បានរក្សាទុកកិត្តិយសខ្មែរយើងរហូតមកដល់សព្វថ្ងៃនេះ ។

### មហាបាតុកម្មថ្ងៃ២០កក្កដា ១៩៤២

ដំណឹងបារាំងចាប់ផ្សឹក លោកគ្រូអាចារ្យ ហែម ចៀវ បានធ្វើឱ្យសាមណសិស្សនៅសាលាបាលីជាន់ខ្ពស់មានការរំជើបរំជួលយ៉ាងខ្លាំង ហើយផ្សាយទៅគ្រប់វត្តអារាម និងខេត្តក្រៅ ដើម្បីរួមប្រជុំគ្នាធ្វើបាតុកម្មតវ៉ាឱ្យបារាំងដោះលែងលោកអាចារ្យ ហែម ចៀវ និងលោក នួន ឌួង ពីទីឃុំឃាំងមកវិញ ។ មហាបាតុកម្មនេះបម្រុងធ្វើនៅថ្ងៃទី១៨ កក្កដា តែត្រូវអាក់ខានទៅវិញ ដោយនៅវត្តលង្កាជាប់ធ្វើពិធីបុណ្យចំរើនព្រះជន្មវស្សាព្រះធម្មលិខិត ល្វី ឯម ជាចាងហ្វាងសាលាបាលីជាន់ខ្ពស់ ក្នុងឱកាសដែលលោកឡើងសមណស័ក្តិជាព្រះធម្មលិខិត ។ ពិធីបុណ្យនេះបានបង្ហើយនៅថ្ងៃទី ១៩ កក្កដា ។ ពេលនោះលោក សឺង ង៉ុកថាញ់ បានភៀសខ្លួនទៅពួនឯការិយាល័យកងអាវុធហត្ថជប៉ុន ដើម្បីគេចខ្លួនឱ្យផុតពីកណ្តាប់ដៃបារាំងសេស ក្នុងគោលបំណងដឹកនាំក្រុមបដិវត្តន៍ក្នុងការរំដោះជាតិឱ្យបានសម្រេច ។ ការទាក់ទងរវាងលោក សឺង ង៉ុកថាញ់ និងមេដឹកនាំខាងបាតុកម្មបានប្រព្រឹត្តទៅយ៉ាងសកម្ម ដោយមានលោក ប៉ិណ្ឌ ចន្ទម៉ុល ជាអ្នកនាំពាក្យទៅជំរាបលោក បាច់ ឈឿន ដែលជាបុរសម្នាក់មានចិត្តរឹងដូចថ្ម ។

(តទៅលេខក្រោយ)




# ពីរដ្ឋបាលកុលសម្ព័ន្ធមករដ្ឋាភិបាលសម័យ

**ប្រែសម្រួលដោយ : ពិន សំខុន** (តពីលេខមុន)

• **២០ ឧសភា :** សម្តេច សីហនុ យាងចេញពីប៉េកាំង ទៅ ព្យុងយ៉ាង ។

• **២ មិថុនា :** សម្តេច សីហនុ ប្រកាសផ្តាច់គ្រប់ទំនាក់ទំនងជាមួយខ្មែរក្រហម ។

•**៨ មិថុនា :** យោធាថៃ បានដឹកជនភៀសខ្លួនខ្មែរ តាមរថយន្តប៊ុស យកមកចាក់ទម្លាក់នៅជើងភ្នំដងរែក នៃតំបន់ព្រះវិហារ ក្រោមការគម្រាមដោយអាវុធ - ខ្មែរក្រហម ៤៥០០០នាក់ បានត្រូវបង្ខំឱ្យដើរកាត់ចំការគ្រាប់មីន ពេលនោះបណ្តាលឱ្យមានការរងគ្រោះថ្នាក់រាប់ពាន់នាក់ ។

•**២៧ មិថុនា :** អគ្គសេនាធិការយោធាថៃ បានបង្កើតតំបន់ហាមឃាត់មួយនៅបាមឡិម នៅក្បែរទីក្រុងត្រាត ខេត្តចន្ទបូរី គឺនៅទីនោះហើយដែលប្រមូលផ្តុំយោធាខ្មែរក្រហមឡើងវិញ - ជំរុំបានត្រៀមសាងសង់ឡើងសម្រាប់ជាជម្រកអង្គការដឹកនាំនៃកម្ពុជាប្រជាធិបតេយ្យ មាន : ប៉ុល ពត, នួន ជា, សុង សេន, អៀង សារី, ខៀវ សំផន ។

•**១៧-១៩** កក្កដា : ប្រ៊ង់ស្វា ប្រូញ៉ុង នៃអង្គការកាកបាទក្រហម និង ហ្សាក់ បូម៉ុង នៃអង្គការយូនិសេហ្វ បានចូលទៅភ្នំពេញ ក្នុងបេសកកម្មពិនិត្យស្ថានភាពភ្នំពេញ រាយការណ៍ឱ្យអង្គការរបស់ពួកគេ ។

•**៣ សីហា :** អង្គការកាកបាទក្រហម និងអង្គការយូនិសេហ្វ ប្រកាសភាពអាសន្នថា ប្រជាជនខ្មែរ ២លាន ៥សែននាក់ កំពុងប្រឈមនឹងទុរភិក្សការហត់ហេវ និង ជម្ងឺ - សហគមន៍អន្តរជាតិផ្តើមបង្កើនសកម្មភាពមនុស្សធម៌ទៅជួយកម្ពុជា ។

•**៩-១៦ សីហា :** បេសកកម្មពិនិត្យស្ថានភាពជាលើកទីពីររបស់ក្រុមកាកបាទក្រហម និងយូនិសេហ្វនៅភ្នំពេញ ដោយនាំទៅជាមួយនូវយន្តហោះមួយគ្រឿង ផ្ទុកដោយជំនួយដល់រដ្ឋធានីខ្មែរ ។

•**១៥-១៩ សីហា :** តុលាការបដិវត្តន៍ប្រជាជននៅភ្នំពេញ បានកាត់ទោសកំបាំងមុខប្រហារជីវិតចំពោះ សាឡុតស ហៅ ប៉ុល ពត និង អៀង សារី ពីបទឧក្រិដ្ឋកម្មប្រល័យពូជសាសន៍ ។

•**២៩-៣០ សីហា :** បេសកកម្មលើកទីបីរបស់កាកបាទក្រហម និងយូនិសេហ្វ ។

•**៣១ សីហា :** កំណើតចលនារំដោះជាតិកម្ពុជា ហៅ មូលីណាកា នៅតំបន់ សឹង ខេត្តបាត់ដំបូង ដោយលោកស័ក្តិបី នាវាចរ គង់ ស៊ីលាស់ និងនាយទាហានឆ័ត្រយោង ញ៉ែម សុផុន - ចលនានេះបានបង្ហាញពីទំនោរទៅខាងសម្តេច សីហនុ ។ នៅភ្នំពេញផ្លូវយន្តហោះពីរត្រូវបានបើក គឺទៅហាណូយមួយ និងទៅព្រៃនគរមួយ ។

•**៦ កញ្ញា :** ខ្មែរក្រហមបង្កើតរណសិរ្សអ្នកស្នេហាជាតិ និហប្រជាធិបតេយ្យ ដើម្បីមហាចលនារួបរួមជាតិកម្ពុជា មានមនុស្សរាប់ពាន់នាក់ បានចូលមកដល់ អារញ្ញប្រាថេត ភាគខាងកើតនៅតំបន់តាប្រាយ៉ា ។

•**៩ កញ្ញា :** សន្និសីទនៃចលនាមិនចូលបក្សសម្ព័ន្ធ នៅទីនោះ លោក ផាំវ៉ាន់ដុក ប្រកាសថា ស្ថានភាពនៅកម្ពុជា នឹងមិនត្រឡប់ក្រោយទេ - អាសនៈកម្ពុជា បានត្រូវទុកឱ្យទំនេរនៅ អ.ស.ប ។

•**២១ កញ្ញា :** មហាសន្និបាតនៃ អ.ស.ប សម្រេចថា "មានតែក្រុមខ្មែរក្រហមទេ ដែលជាតំណាងស្របច្បាប់សម្រាប់កម្ពុជា ។

•**២៤ កញ្ញា :** បវេសនកាលរបស់សិស្សជាលើកដំបូងបង្អស់បន្ទាប់ពីខែកញ្ញា ឆ្នាំ១៩៧៤ មក ។

•**២៦ កញ្ញា :** ផ្តើមសកម្មភាពសង្គ្រោះជីវិតប្រជាជនកម្ពុជា ក្រោមទង់ជាតិកាកបាទក្រហម និង យូនិសេហ្វ ។

•**៩ តុលា :** បង្កើតរណសិរ្សរំដោះប្រជាពលរដ្ឋខ្មែរ ដឹកនាំដោយលោក សឺង សាន នៅតំបន់សុខសាន្តនៃខេត្តត្រាច ប្រទេសថៃ ។

**ឆ្នាំ ១៩៧៩**

•**១២ តុលា :** ប៉ែន សុវណ្ណ ជូននឹងប្រេស្នេវនៅមូស្គូ

•**១៣ តុលា :** ស្ពានផ្លូវអាកាសពីបាងកក នៅភ្នំពេញត្រូវបានអនុញ្ញាតបន្ទាប់ពីការចរចាយ៉ាងវែងដោយរដ្ឋាភិបាលភ្នំពេញ មានបំណងភ្ជាប់ការដឹកស្បៀងទៅនឹងការទទួលស្គាល់រដ្ឋបាលភ្នំពេញ ដោយសហគមន៍អន្តរជាតិ- ជាមួយស្បៀង និងថ្នាំសង្កូវអ្នកកាសែតបានផ្តល់សេចក្តីរាយការណ៍ឱ្យពិភពលោកបានឱ្យដឹងខ្លះៗពីសោកនាដកម្មដែលបានកើតឡើងនៅក្នុងកម្ពុជា ។

•**១៤ តុលា :** រដ្ឋបាលភ្នំពេញបង្កើតនាយកដ្ឋានកាន់តែច្រើនបង្ហាញរូបរាងជារដ្ឋាភិបាលប្រក្រតីកាន់តែច្បាស់លាស់ជាងមុនៗ - យន្តហោះកាកបាទក្រហមមានសកម្មភាពភ្ជាប់ភ្នំពេញ និងបាងកករាល់ថ្ងៃ។

•**១៩ តុលា :** អង្គការកាកបាទក្រហម បានអំពាវនាវឱ្យសហគមន៍អន្តរជាតិ ជួយដល់កម្ពុជា ។

•**២០ តុលា :** បង្កើតសមាគមអ្នកសារព័ត៌មាននៃកម្ពុជាប្រជាមានិត ។

(តទៅលេខក្រោយ)



# ស្ត្រីខ្មែរដំបូងបង្អស់ដែលបានធ្វើដំណើរ ប្រទេសបារាំងមកភ្នំពេញតាមផ្លូវគោក



(តពីលេខមុន)

**ដោយ : ពិន នារីពិទូ**

•••ថ្ងៃទី២៧ ខែសីហា ឆ្នាំ២០០៦ : យើងបានទស្សនាទីក្រុង Perm ក្រោមពន្លឺថ្ងៃចែងចាំង។ Perm មានស្ថាបត្យកម្មនៃសំណង់អគារប្លែកៗ ទិដ្ឋភាពស្ពានថ្មីដែលស្ថិតនៅតាមផ្លូវ Stroite-ley ។ ពួកយើងមានការស្នាក់ស្នើរក្នុងការទៅទស្សនាសារមន្ទី Gulag ដែលមានចំងាយ៩០ គីឡូម៉ែត្រ ប៉ុន្តែក្រោយមកក៏សំរេចចិត្តធ្វើដំណើរដោយថ្មើរជើងនៅតាមផ្លូវ ដើម្បីទស្សនាទីក្រុង Perm ។ សណ្ឋាគារដែលយើងស្នាក់នៅមានភាពធំទូលាយលាតសន្ធឹងវែងមានកំពស់១០ជាន់ សាងសង់ឡើងយ៉ាងសាមញ្ញ អាហារពិសេសរបស់ពួកយើងនៅទីនោះគឺ ស្រាបៀរដ៏ល្បីឈ្មោះ Baltica, Twist និង Holsten ក្លែមជាមួយជ្រក់ត្រសក់ធំៗ និងផ្លែអូលីវដ៏ឈ្ងុយ នាថ្ងៃខួបកំណើតរបស់ អូរេលី Aurélie ។

អ្នកដំណើរស្ត្រីទាំងពីររូប ទើបនឹងបំពេញចម្ងាយផ្លូវប៉ារីស-ភ្នំពេញ តាមផ្លូវគោកបានត្រឹមតែ ១ភាគបីតែប៉ុណ្ណោះនៅឡើយ ។ ភូមិសាស្ត្រនៅតំបន់ជាបន្តទៅទៀត ជាតំបន់ខ្ពង់រាបមានភ្នំខ្ពស់ៗ ដូចជាភ្នំអ៊ូរាល់នេះជាដើម ហើយក៏នៅមានជួរភ្នំនៃតំបន់ម៉ុងគោលីដ៏ធំៗ ហើយយ៉ាងត្រជាក់នៅខាងមុខផ្លូវនៃអ្នកដំណើរពិភពលោកទាំងពីរអ្នកទៀតផង ។

រុស្ស៊ី ដែលស្ថិតនៅខាងកើតនៃជួរភ្នំអ៊ូរ៉ាល់ Ural ដែលជាព្រំដែនបែងចែកទឹកដីរវាងអឺរ៉ុប និង អាស៊ុ ។ ក្រោមពន្លឺថ្ងៃនៃធាតុអាកាសត្រជាក់ ពួកយើងមានអារម្មណ៍រីករាយជាអនេក និងសូមថ្លែងអំណរគុណដល់ក្រុមគ្រួសារ និងមិត្តភ័ក្រ្តដែលបានជួយជ្រោមជ្រែងពួកយើងកន្លងមក។ ពួកយើងបានឈានចូលទឹកដីអាស៊ីជាផ្លូវការដោយឆ្លងកាត់ព្រំប្រទល់រវាងទ្វីបអឺរ៉ុប និងអាស៊ីក្នុងចំងាយ៤០ គីឡូ ម៉ែត្រ មុនពេលមកដល់ Yekaterinburg យើងបានទៅទស្សនាវត្តអារ៉ាម Iama Ganina ដែលមានចំងាយឆ្ងាយពីទីក្រុង១៦គីឡូម៉ែត្រ ដែលសាងសង់ធ្វើពីឈើ និងក្បាច់ចំលាក់តាមបែប



អូរេលី Aurélie និងស៊ីលវីយ៉ា Sylvia





ថ្ងៃទី២៨ ខែសីហា ឆ្នាំ២០០៦: យើងបានឆ្ពោះដំណើរនៅទិសខាងកើតឈាងខាងត្បូងនៃក្រុង Perm គឺស្រុក Kungur ដែលជាតំបន់ប្រវត្តិសាស្ត្រផ្នែកស្ថាបត្យកម្ម និងជាមជ្ឈមណ្ឌលពាណិជ្ជកម្ម ឧស្សាហកម្ម និងដឹកជញ្ជូនរបស់ប្រទេសរុស្ស៊ី ។ យើង បានកក់បន្ទប់នៅសណ្ឋាគារ Stalagmite ដែលមានតំលៃ ២០យូរ៉ូក្នុងមួយយប់ ក្នុងបំណងទៅទស្សនាបឹងទឹកកកដ៏ល្បីឈ្មោះ ពួកយើងបានចំណាយពេលមួយម៉ោងកន្លះដើម្បីទស្សនាស្ថាបត្យកម្មធ្វើពីទឹកកកនេះ។

ថ្ងៃទី២៨ ខែសីហា ឆ្នាំ២០០៦ : យើងបានមកដល់ Yekaterinburg ជាទីក្រុងធំលំដាប់ទីប្រាំរបស់ប្រទេសប្រពៃណីរបស់ប្រទេសនេះ ជាទីកន្លែងសក្ការៈគោរពបូជានៃប្រជាជនរុស្ស៊ី ហើយក៏ជាកន្លែងដែលបានបន្សល់នូវរឿងរ៉ាវរបស់ជនជាតិរ៉ូមែននូវ Romanov ដែលត្រូវបានសំលាប់នៅក្នុងឆ្នាំ ១៩១៨ ។ ទោះបីជាធាតុអាកាសត្រជាក់ឈ្ងុលច្រមុះយ៉ាងណាក៏ដោយ ពួកយើងនៅតែអាចធ្វើដំណើរទៅមុខដោយថ្មើរជើង ដើម្បីទស្សនាទីក្រុងនេះ ពួកយើងដើរគ្រប់ច្រកល្ហកដោយចំណាយអស់រយៈពេលបីម៉ោង ពួកយើងមានការចាប់អារម្មណ៍យ៉ាងខ្លាំងទៅលើស្ថាបត្យកម្មប្លែកៗ នៃសំណង់អាគារ ព្រះវិហារ និងរូបចំលាក់ លេនីន ។

(តទៅលេខក្រោយ)

# A.B.C MONEY TRANSACTION, INC

## $ ក្រុមហ៊ុនផ្ញើប្រាក់ A.B.C

### តម្លៃសំរាប់ផ្ញើទៅស្រុកខ្មែរ

| | | ភ្នំពេញ | តាមខេត្ត |
|---|---|---|---|
| ផ្ញើ $100 | យកកម្រៃ | $4.50 | $5.50 |
| $200 | យកកម្រៃ | $9.00 | $11.00 |
| $300 | យកកម្រៃ | $13.50 | $16.50 |
| $500 | យកកម្រៃ | $16.00 | $17.00 |
| $1000 | យកកម្រៃ | $25.00 | $26.00 |
| $1500 | យកកម្រៃ | $35.00 | $36.00 |
| $2000 | យកកម្រៃ | $42.00 | $43.00 |
| $2200 | យកកម្រៃ | $46.00 | $47.00 |



សូមកុំភ្លេចទាក់ទងការិយាល័យក្រុមហ៊ុន ABC ដែលនៅជិតលោកអ្នក ប្រសិនបើមានបំណងចង់ផ្ញើប្រាក់ទៅស្រុកខ្មែរ ឬក៏ទូរស័ព្ទមកយើងតាម

**នៅរដ្ឋ VIRGINIA សូមទាក់ទង**

**ABC MONEY TRANSATION ,INC.**

**8 locations to serve you in Virginia**

- 6757 Willson Blvd.-Ste.#25 Tel : 703.534.2600
- 4291 Holland Rd-Ste.#111 Tel : 757.474.9400
- 10428 Ridgefield Pkwy Tel : 804-740-2454
- 2519 W . Mercury Blvd . Tel : 757.265.6305
- 23520 Overland Dr. Tel : 703.661.6666
- 6314 Rigsby Rd. Tel : 804.288.2988
- 7252 Arlingston Blvd . Tel : 703.641.0778
- 6217 W. Broad St. Tel : 804.288.6988

**ARIZONA**

◆4215 N 19th Ave. . Tel : 602.266.6744

**GEOERGIA**

◆ 4897 Buford Hwy. Ste. 202. Tel: 770.457.7888

**ILLINOIS**

◆4871 N. Broadway . Tel :773.989.7332

**MASSACHUSETTE**

◆ 996 Dorchester Ave. Tel:617.825.9380

◆ 1365-1377 Dorchester Ave. -Ste.4,Froor 1 .Tel : 617.265.4600

**MINNESOTA**

◆ 2718 Nicollet Ave . S.- Ste. 102 B

◆ Tel : 612.871.4731

◆ 6350 Brooklyn Blvd . Tel : 763.503.3947

**NORTH CAROLINA**

◆ 3000 Central Ave. Ste . #9 . Tel : 704-532-4420

**OREGON**

◆6908 N.E. Sandy Blvd . Tel : 503.281.8088

**PHILADFELPHIA**

◆5520 . Whitaker Ave. -Unit 2 . Tel : 215.831.9794

◆571 Adams Ave . Ave.#4 . Tel : 215.342.6623

**TEXAS**

◆1818 E . Pioneer Pkwy. Ste.156 . Tel : 317.461.1461

◆2615 W . Pioneer Pkwy. Ste.136 . Tel : 214.788.2817

◆5302 E . Belknap St.- Ste.D6 . Tel : 817.831.4836

◆3538 W . Walnut St. Tel : 972.272.2253

◆11205 Bellaire Blvd . Tel : 281.561.6600

◆10909 Scarsdale Blvd . Tel : 281.481.2700

◆13480 Veterans Memorial Dr.-Ste. F2. Tel: 281.587.0807

**WASHINTON STATE**

◆766 S.38th St,. Tel : 253.475.2847

◆3818 S.Graham St.-Ste. C Tel : 206.721.2070

Office : 714-590-8740 Fax : 714-590-8776

Cell: 714-603-3509 Toll Free : 1-877-939-0110

## ក្រុមហ៊ុនទទួលផ្ញើប្រាក់ទៅកម្ពុជា

ABC ជាក្រុមហ៊ុនផ្ញើប្រាក់តែមួយគត់នៅស្រុកខ្មែរ ដែលមានការប្រគល់ប្រាក់ដល់ផ្ទះ

- ស្របច្បាប់
- រហ័សទាន់ចិត្ត
- ធានារ៉ាប់រង និងជូនប្រាក់ទៅដល់ផ្ទះ
- កំរៃផ្ញើថោកជាងកន្លែងដទៃ

### ក្រៅពីការផ្ញើប្រាក់ក្រុមហ៊ុនមានលក់

PHONE CARD និង PINLESS សំរាប់ទូរស័ព្ទទៅស្រុកខ្មែរ ដែលផលិតដោយក្រុមហ៊ុន ABC ផ្ទាល់ មានគុណភាពល្អ ហើយជាពិសេស CARD របស់យើងនឹងទុកបានរហូត មិនអស់កំណត់កាលឡើយ ( NEVER EXPIRED) ។

ត្រូវការអ្នកសហការ (AGENTS ) ជាមួយយើងទូទាំងសហរដ្ឋអាមេរិក និងបានទទួលប្រាក់ចំណូលយ៉ាងខ្ពស់ !

ព័ត៌មានបន្ថែមសូមទាក់ទង CHET THACTHER តាមទូរស័ព្ទ និងអាស័យដ្ឋានខាងក្រោម :

ABC MONEY TRANSATION, INC
12019 Garden Grove Blvd., Ste.#204
Garden Grove , CA 92843
chesterthatcher@yahoo.com

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសំរួលពីភាសាអង់គ្លេស    អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី    ច្បាប់ចេញផ្សាយថ្ងៃសុក្រ ទី០៩ ខែកក្កដា ឆ្នាំ២០១០

# Minimum Wage Set To Rise to $61 This Year

BY NEOU VANNARIN
THE CAMBODIA DAILY

The Labor Advisory Committee yesterday agreed to increase the minimum wage for garment workers to $61 per month—a far lower figure than the $93 unions were calling for.

During a meeting at the Labor Ministry, 20 out of 25 LAC members present voted to raise the minimum wage by $5 and incorporate into the figure an existing $6 living allowance, which workers have received since 2008. The $11 increase will also apply to factory interns' wages, which will rise from $45 to $56.

The Ministry of Social Affairs released a statement in June announcing the government's support for this plan.

The increase will be implemented in October, and will remain in force until the next LAC meeting on the minimum wage, which is scheduled for 2014, according to Vong Sauth, Minister of Labor and chairman of the LAC, a policymaking body comprising representatives from the government, labor unions and the Garment Manufacturers Association in Cambodia.

Union leaders reacted defiantly to the decision. Speaking after the meeting, president of the Coalition of Cambodian Apparel Workers Democratic Union Ath Thon said the increase was nowhere near enough.

"This $5 [increase] does not respond to the needs of the workers; it is a very small amount," he said.

Mr Thon, who did not vote for the $61 minimum wage, added that he would call a union meeting soon to discuss possible repercussions.

"We did not agree to this decision, and we will keep on making our demands," he added. "If our workers disagree with this decision, we will demonstrate or strike."

Mr Thon also called for the minimum wage to be assessed every year, instead of waiting until the next LAC meeting in 2014.

Free Trade Union leader Chea Mony said yesterday that he did not want to comment on the meeting because he had not been invited, but he insisted that a three-day strike planned for July 13 to 15 will go ahead.

"Our work stoppages will still go on, because I have not received any response," he said. On May 23 the FTU, which claims to represent about 86,000 workers, voted to strike if the LAC failed to approve at least a $20 increase.

On Monday, 20 unions, including CCAWDU, presented a joint statement to the government and GMAC calling for a $93 minimum wage.

However, GMAC president Van Sou Ieng said this morning that this figure was far higher than the minimum amount necessary to meet living costs.

Mean Sophea, the Commerce Ministry representative at the LAC, said he approved of the $61 wage. He suggested that further increases could drive potential investors to Vietnam, where he claimed worker productivity is higher while the minimum wage is still $70.

"If we raised the minimum wage [to $93], it would be like pushing investors out of our country," he said, adding that overheads such as electricity and transportation costs in Cambodia were much higher than in Vietnam.

Moeun Tola, head of the labor rights program at the Community Legal Education Center, said he thought a minimum wage of between $72 and $74 would allow workers to meet their living costs.

"The new...raise does not help anything. The living standard of garment workers is just the same," he said, adding he did not think an increase to around $72 would drive away investment, because Cambodian factories were far more profitable than their Vietnamese counterparts. Productivity is also increasing in Cambodia, he said, citing data from a report released by the Cambodian Institute for Development Study in September 2009.

The study found that worker productivity in Cambodia increased from $235 per month in 2004 to $283.94 per month last year, while real wages dropped during the same period.

As the meeting drew to a close, LAC chairman Mr Sauth warned union leaders to accept the committee's decision, whether they agreed with it or not.

"We have to implement this based on the law, and if anyone does not follow the law, we will let the law take its course," he said.

Mr Tola pointed out that unions could voice their disapproval without breaking the law.

"There is no law to prohibit them from striking," he said.

# ប្រាក់ខែអប្បបរមាត្រូវបានកំណត់ដំឡើងដល់ ៦១ ដុល្លារនៅឆ្នាំនេះ

ដោយ នៅ វណ្ណារិន
THE CAMBODIA DAILY

គណៈកម្មាធិការប្រឹក្សាការងារ (LAC) កាលពីម្សិលមិញ បានព្រមព្រៀងដំឡើងប្រាក់ខែអប្បបរមាឱ្យកម្មករកាត់ដេរដល់ចំនួន៦១ដុល្លារ ដែលសហជីពនានាបានអំពាវនាវ ។

អំឡុងកិច្ចប្រជុំមួយនៅក្រសួងការងារ សមាជិក ២០រូប ក្នុងចំណោមសមាជិក ២៥រូបនៃ LAC បានបោះឆ្នោតដំឡើងប្រាក់ខែ អប្បបរមាត្រឹមតែ៥ដុល្លារទៀត និងបញ្ចូលប្រាក់ឧបត្ថម្ភជីវភាពចំនួន ៦ដុល្លារ ដែលមានស្រាប់ដែលកម្មករបានទទួលតាំងពីឆ្នាំ ២០០៨នោះទៅក្នុងតួលេខនេះ ។ ការដំឡើងប្រាក់ចំនួន១១ដុល្លារនេះ ក៏នឹងអនុវត្តចំពោះប្រាក់ខែរបស់អ្នកហាត់ការក្នុងរោងចក្រផងដែរដែលនឹងឡើងពី ៤៥ដុល្លារដល់៥៦ដុល្លារ ។

ក្រសួងសង្គមកិច្ចបានចេញសេចក្តីថ្លែងការណ៍មួយកាលពីក្នុងខែមិថុនា ដោយប្រកាសស្តីពីការគាំទ្ររបស់រដ្ឋាភិបាលចំពោះផែនការនេះ ។

យោងតាមលោក វង សួត រដ្ឋមន្ត្រីក្រសួងការងារ និងជាប្រធាន LAC ដែលជាស្ថាប័នបង្កើតគោលការណ៍នានាដែលមានអ្នកតំណាងមកពីរដ្ឋាភិបាល សហជីពការងារ និងសមាគមរោងចក្រកាត់ដេរនៅក្នុងប្រទេសកម្ពុជា (GMAC) នោះ បានឱ្យដឹងថាការដំឡើងប្រាក់ខែនេះនឹងត្រូវអនុវត្តក្នុងខែតុលា ហើយនឹងបន្តអនុវត្តរហូតដល់កិច្ចប្រជុំបន្ទាប់របស់ LAC ស្តីពីប្រាក់ខែអប្បបរមាដែលគ្រោងធ្វើនៅឆ្នាំ២០១៤ ។

ក្រុមមេដឹកនាំសហជីពបានប្រតិកម្មយ៉ាងខ្លាំងចំពោះសេចក្តីសម្រេចនេះ ។ លោក អាត់ ធន ប្រធានក្រុមចម្រុះនៃសម្ព័ន្ធសហជីពប្រជាធិបតេយ្យកម្មកររោងចក្រកាត់ដេរកម្ពុជា (CCAWDU) ថ្លែងក្រោយការប្រជុំថា ការដំឡើងប្រាក់ខែនេះមិនគ្រប់គ្រាន់ឡើយ ។

លោកបានថ្លែងថា "(ការដំឡើង) ប្រាក់៥ដុល្លារនេះមិនឆ្លើយតបទៅនឹងតម្រូវការរបស់កម្មករទេ វាជាចំនួនតិចតួចបំផុត" ។ លោក អាត់ ធន់ ដែលមិនបានបោះឆ្នោតសម្រាប់ប្រាក់ខែអប្បបរមា៦១ដុល្លារនេះ បានបន្ថែមថា លោកនឹងបើកកិច្ចប្រជុំសហជីពមួយឆាប់ៗនេះ ដើម្បីពិភាក្សាអំពីផលវិបាកដែលអាចកើតមាន ។

លោកបានបន្ថែមថា "យើងមិនយល់ស្របចំពោះសេចក្តីសម្រេចនេះឡើយ ហើយយើងនៅតែបន្តធ្វើការទាមទាររបស់យើង ។ ប្រសិនបើកម្មកររបស់យើងមិនយល់ស្របជាមួយសេចក្តីសម្រេចនេះយើងនឹងធ្វើបាតុកម្ម ឬកូដកម្ម" ។

លោក អាត់ ធន់ ក៏បានអំពាវនាវផងដែរឱ្យមានការវាយតម្លៃប្រាក់ខែអប្បបរមារៀងរាល់ឆ្នាំ ដោយមិនបាច់រង់ចាំរហូតដល់កិច្ចប្រជុំបន្ទាប់របស់ LAC ក្នុងឆ្នាំ២០១៤ឡើយ ។

លោក ជា មុនី ប្រធានសហជីពសេរីកម្មករបានថ្លែងកាលពីម្សិលមិញថា លោកមិនចង់ធ្វើអត្ថាធិប្បាយអំពីកិច្ចប្រជុំនេះទេ ពីព្រោះលោកមិនត្រូវបានអញ្ជើញចូលរួមឡើយ ប៉ុន្តែលោកបានបញ្ជាក់ថា កូដកម្មរយៈពេល៣ថ្ងៃ ដែលគ្រោងឡើងសម្រាប់ថ្ងៃទី១៣ ដល់ថ្ងៃទី១៥ ខែកក្កដា នឹងបន្ត ។

លោកបានថ្លែងថា "ការឈប់ធ្វើការរបស់យើងនឹងនៅតែបន្ត ពីព្រោះយើងមិនទាន់ទទួលបានចម្លើយតបណាមួយនៅឡើយទេ" ។

កាលពីថ្ងៃទី២៣ ខែឧសភា សហជីពសេរីកម្មករ ដែលអះអាងថាតំណាងឱ្យកម្មករប្រហែល ៨៦.០០០ នាក់នោះ បានបោះឆ្នោតធ្វើកូដកម្ម បើ LAC មិនព្រមដំឡើងប្រាក់ខែយ៉ាងតិច ២០ដុល្លារ ។

កាលពីថ្ងៃច័ន្ទ សហជីពចំនួន ២០ រួមទាំង CCAWDU ផង បានចេញសេចក្តីថ្លែងការណ៍រួមមួយទៅរដ្ឋាភិបាល និង GMAC ដោយអំពាវនាវឱ្យមានការដំឡើងប្រាក់ខែអប្បបរមា៩៣ដុល្លារ ។

ទោះជាយ៉ាងនេះក្តី លោក វ៉ាន់ ស៊ូអៀង ប្រធាន GMAC បានថ្លែងនៅព្រឹកនេះថា តួលេខនេះខ្ពស់ឆ្ងាយជាងចំនួនប្រាក់អប្បបរមាដែលចាំបាច់ដើម្បីដោះស្រាយថ្លៃទ្រទ្រង់ការរស់នៅ ។

លោក មៀន សុភា អ្នកតំណាងរបស់ក្រសួងពាណិជ្ជកម្មនៅឯ LAC បានថ្លែងថា លោកបានយល់ស្របចំពោះប្រាក់ខែ ៦១ដុល្លារនេះ ។ លោកបានផ្តល់យោបល់ថា ការដំឡើងប្រាក់ខែច្រើនជាងនេះអាចធ្វើឱ្យវិនិយោគិនធំៗរត់ទៅប្រទេសវៀតណាម ដែលលោកបានអះអាងថា ផលិតភាពកម្មករខ្ពស់ជាងយើងខណៈដែលប្រាក់ខែអប្បបរមានៅត្រឹម៧០ដុល្លារនៅឡើយ ។

លោកបានថ្លែងថា "ប្រសិនបើយើងដំឡើងប្រាក់ខែអប្បបរមា (ដល់ទៅ៩៣ដុល្លារ) វាហាក់ដូចជាជំរុញឱ្យវិនិយោគិនចេញពីប្រទេសយើងអញ្ចឹង" ដោយលោកបន្ថែមថា ការចំណាយដូចជាថ្លៃភ្លើង និងថ្លៃដឹកជញ្ជូនក្នុងប្រទេសកម្ពុជា ខ្ពស់ជាងនៅប្រទេសវៀតណាមខ្លាំងណាស់ ។

លោក មឿន តុលា ប្រធានកម្មវិធីសិទ្ធិការងារនៅឯមជ្ឈមណ្ឌលអប់រំច្បាប់សម្រាប់សហគមន៍បានថ្លែងថា លោកគិតថា ប្រាក់ខែអប្បបរមារវាងពី ៧២ ដុល្លារទៅ៧៤ដុល្លារ នឹងធ្វើឱ្យកម្មករដោះស្រាយថ្លៃទ្រទ្រង់ការរស់នៅរបស់ពួកគេបាន ។

លោកបានថ្លែងថា "ការដំឡើងប្រាក់ខែថ្មីនេះមិនជួយអ្វីបានទេ ។ កម្រិតជីវភាពរបស់កម្មករនៅតែដដែល" ដោយលោកបន្ថែមថា លោកមិនគិតថាការដំឡើងប្រាក់ខែដល់ប្រហែល៧២ដុល្លារនឹងធ្វើឱ្យបាត់បង់ការវិនិយោគទេ ពីព្រោះរោងចក្រកម្ពុជានានាបានចំណេញប្រាក់ជាងសមភាគីវៀតណាមរបស់ខ្លួនឆ្ងាយណាស់ ។ លោកបានបន្ថែមថា ផលិតភាពក៏កំពុងតែកើនឡើងផងដែរ នៅក្នុងប្រទេសកម្ពុជា ដោយលោកលើកឡើងអំពីទិន្នន័យពីរបាយការណ៍មួយដែលចេញដោយវិទ្យាស្ថានកម្ពុជា សម្រាប់ការសិក្សាពីការអភិវឌ្ឍក្នុងខែកញ្ញា ឆ្នាំ២០០៩ ។

ការសិក្សានេះបានរកឃើញថា ផលិតភាពកម្មករនៅក្នុងប្រទេសកម្ពុជា បានកើនឡើងពី២៣៥ដុល្លារក្នុងមួយខែក្នុងឆ្នាំ២០០៤ ដល់២៨៣.៩៤ ដុល្លារក្នុងមួយខែកាលពីឆ្នាំទៅ ខណៈដែលប្រាក់ខែពិតប្រាកដបានធ្លាក់ចុះ អំឡុងរយៈពេលដូចគ្នានេះ ។

ខណៈកិច្ចប្រជុំឈានទៅរកការបញ្ចប់នោះ លោក វង សួត ដែលជាប្រធាន LAC បានព្រមានក្រុមមេដឹកនាំសហជីពឱ្យទទួលយកសេចក្តីសម្រេចរបស់គណៈកម្មាធិការនេះ មិនថាពួកគេយល់ស្របឬអត់នោះទេ ។ លោកថ្លែងថា "យើងត្រូវតែអនុវត្តសេចក្តីសម្រេចនេះដោយផ្អែកលើច្បាប់ ហើយប្រសិនបើនរណាម្នាក់មិនអនុវត្តតាមច្បាប់នេះ យើងនឹងឱ្យច្បាប់ជាអ្នកសម្រេច" ។

លោក តុលា បានចង្អុលបង្ហាញថា សហជីពនានាអាចសម្តែងការមិនយល់ស្របរបស់ខ្លួនដោយមិនរំលោភច្បាប់ទេ ។ លោកបានថ្លែងថា "គ្មានច្បាប់ហាមប្រាមពួកគេមិនឱ្យធ្វើកូដកម្មនោះទេ" ៕

## តមកពីទំព័រទី ០១ ពិធីហែក្បួនជ្រោយអង្វរថ្ងៃ៤កក្កដា...

បានឃើញនឹងប្រៀបធៀបរវាងកងទ័ពនៃប្រទេសទាំងពីរ តើមានការទទួលស្គាល់នឹងលើកដំកើងខុសគ្នាប៉ុនណា ។ ថ្ងៃបុណ្យ៤កក្កដា មានន័យទូលំទូលាយណាស់ចំពោះប្រជាជាតិអាមេរិកាំង ហើយអត្ថន័យនេះយោធាខ្មែរ ក៏ចង់ឃើញគេបង្ហាញទឹកចិត្តស្នេហាជាតិ វិរភាពរបស់ អ្នកដែលមានតួនាទីការពារជាតិមកពីកម្ពុជាដែរ ៕

*- ខ្មែរប៉ុស្តិ៍-*



ឌឹ ខេមបូឌា ដេលី The Cambodia Daily

# Thailand Gives No Info on 'Red Shirts' in Country, Gov't Says

BY MARK WORLEY
THE CAMBODIA DAILY

Government officials said yesterday they had not yet received information from Thailand regarding the names of wanted anti-Thai government "red shirt" activists possibly using Cambodia as a hideout.

Despite the high-profile arrest and deportation of two Thai bombing suspects who admitted being members of the red shirt movement earlier this week, Foreign Affairs spokesman Koy Kuong said yesterday that Thailand had not provided a list of other wanted criminals.

"No, they have not provided us with information [about other criminals] so far," Mr Kuong said.

Thai news reports have claimed that several high-profile red shirt members escaped to Cambodia to regroup after the Thai government in May broke up their protest that turned Bangkok into a battleground.

The government has denied the reports, including those that claimed the now-deported Thai bomb suspects Kobchai Boonblod and Varasareeya Boonsom had crossed into Cambodia. But the government later admitted that the same news reports, initially rejected as false, had been used to identify and arrest the pair in Siem Reap City last Saturday.

Sao Bunrith, chief of police at the Poipet border crossing, said he had never been provided with a list of wanted Thai red shirt activists.

"I have never been contacted by Thai officials about wanted Thai protesters," he said.

Mr Kuong said yesterday that Cambodia would actively pursue "terrorists," regardless of who they were politically aligned with.

"We don't care about whether they are red shirts, yellow shirts or blue shirts," he said. "We will just continue to implement our policy."

Officials at the Thai Embassy in Phnom Penh and the Thai Ministry of Foreign Affairs could not be reached.

Lieutenant General Khieu Sopheak, spokesman for the Interior Ministry, said yesterday that the government would act as soon as it received information that terrorists were inside Cambodia.

"I hope there are no more [terrorists in Cambodia]," Lt Gen Sopheak said, adding that the government had made it clear that Cambodia was not a "safe haven" for criminals.

*(Additional reporting by Phorn Bopha)*

# រដ្ឋាភិបាលនិយាយថា មិនមានការស្នើឱ្យតាមចាប់ខ្លួនក្រុមអាវក្រហមទេ

ដោយ MARK WORLEY
THE CAMBODIA DAILY

ក្រុមមន្ត្រីរដ្ឋាភិបាលបាននិយាយកាលពីម្សិលមិញថា ខ្លួនមិនទាន់បានទទួលពត៌មានពីប្រទេសថៃទាក់ទិននឹងឈ្មោះរបស់ក្រុមសកម្មជន "អាវក្រហម" ប្រឆាំងរដ្ឋាភិបាលថៃដែលកំពុងត្រូវបានតាមចាប់ខ្លួន ដែលប្រហែលជាកំពុងប្រើប្រាស់ប្រទេសកម្ពុជាជាកន្លែងលាក់ខ្លួននៅឡើយទេ ។

ថ្វីបើមានការចាប់ខ្លួននិងការនិរទេសខ្លួនជនសង្ស័យបំផ្ទុះគ្រាប់បែកជាជនជាតិថៃពីរនាក់ ដែលបានសារភាពថា ខ្លួនជាសមាជិកនៃចលនាអាវក្រហមកាលពីដើមសប្តាហ៍នេះក៏ដោយ ក៏លោក កុយ គួង ជាអ្នកនាំពាក្យក្រសួងការបរទេសបានមានប្រសាសន៍កាលពីម្សិលមិញថា ប្រទេសថៃមិនទាន់បានផ្តល់បញ្ជីឈ្មោះឧក្រិដ្ឋជនដែលកំពុងត្រូវបានតាមចាប់ខ្លួនផ្សេងទៀតនៅឡើយទេ ។

លោក កុយ គួង បានមានប្រសាសន៍ថា "ទេ ពួកគេមិនទាន់បានផ្តល់ពត៌មានដល់យើង (អំពីឧក្រិដ្ឋជនផ្សេងៗទៀត)នៅឡើយទេរហូតមកទល់ពេលនេះ" ។ របាយការណ៍ពត៌មានថៃនានាបានបញ្ជាក់អះអាងថា សមាជិកចលនាក្រុមអាវក្រហមសំខាន់ៗមួយចំនួនបានរត់ភៀសខ្លួនមកប្រទេសកម្ពុជាដើម្បីប្រមូលផ្តុំកម្លាំងឡើងវិញ បន្ទាប់ពីរដ្ឋាភិបាលថៃបានបំបែកបាតុកម្មដែលមានរយៈពេលរាប់ខែរបស់ពួកគេដែលបានធ្វើឲ្យក្រុងបាងកកក្លាយជាសមរភូមិកាលពីខែឧសភា ។

រដ្ឋាភិបាលបានច្រានចោលរបាយការណ៍ទាំងនោះយ៉ាងខ្លាំង ដែលរួមមានទាំងរបាយការណ៍ ដែលបានអះអាងថា ឈ្មោះ កូបចៃ ប៊ូនប្លូតនិងឈ្មោះ វ៉ារ៉ាសារីយ៉ា ប៊ូនសុំ ជាជនសង្ស័យបំផ្ទុះគ្រាប់បែកជនជាតិថៃដែលត្រូវបាននិរទេសខ្លួនរួចទៅហើយនោះ បានឆ្លងដែនចូលមកប្រទេសកម្ពុជាផង ។

ប៉ុន្តែក្រោយមក រដ្ឋាភិបាលបានសារភាពថា សេចក្តីរាយការណ៍ពត៌មានដដែលនេះ ដែលដំបូងឡើយត្រូវបានច្រានចោលថា ជាពត៌មានមិនពិតនោះ ត្រូវបានប្រើប្រាស់ដើម្បីកំណត់អត្តសញ្ញាណនិងចាប់ខ្លួនលោក កូបចៃ និងអ្នកស្រី វ៉ារ៉ាសារីយ៉ា នៅក្នុងក្រុងសៀមរាបកាលពីថ្ងៃសៅរ៍សប្តាហ៍មុន ។

លោក សៅ ប៊ុនរិទ្ធ ជាប្រធាននគរបាលនៅច្រកព្រំដែនអន្តរជាតិប៉ោយប៉ែតបានមានប្រសាសន៍ថា លោកមិនដែលទទួលបានបញ្ជីឈ្មោះសកម្មជនអាវក្រហមថៃដែលកំពុងត្រូវបានតាមចាប់ខ្លួននោះទេ ។

លោកបានមានប្រសាសន៍ថា "ក្រុមមន្ត្រីថៃមិនដែលទាក់ទងមកខ្ញុំអំពីក្រុមបាតុករថៃដែលកំពុងត្រូវបានតាមចាប់ខ្លួននោះទេ" ។

លោក កុយ គួង បានមានប្រសាសន៍កាលពីម្សិលមិញថា ប្រទេសកម្ពុជានឹងតាមចាប់ខ្លួន "ភេរវករ" យ៉ាងសកម្ម មិនថាពួកគេពាក់ព័ន្ធនឹងគណបក្សនយោបាយណាឡើយ ។

លោកបានមានប្រសាសន៍ថា "យើងមិនខ្វល់ថា តើពួកគេជាក្រុមអាវក្រហម ក្រុមអាវលឿង ឬក្រុមអាវខៀវនោះទេ" ។ "យើងនឹងត្រូវបន្តអនុវត្តគោលនយោបាយរបស់យើងប្រឆាំងភេរវកម្ម" ។

គេមិនអាចទាក់ទងទៅក្រុមមន្ត្រីស្ថានទូតថៃនៅក្នុងក្រុងភ្នំពេញនិងក្រសួងការបរទេសថៃបានទេកាលពីម្សិលមិញ ។

លោកឧត្តមសេនីយ៍ឯក ខៀវ សុភ័គ ជាអ្នកនាំពាក្យក្រសួងមហាផ្ទៃបានមានប្រសាសន៍កាលពីម្សិលមិញថា រដ្ឋាភិបាលនឹងចាត់វិធានការភ្លាម នៅពេលដែលខ្លួនទទួលបានពត៌មានថា ភេរវករស្ថិតនៅក្នុងប្រទេសកម្ពុជា ។

លោកឧត្តមសេនីយ៍ឯក ខៀវ សុភ័គ បានមានប្រសាសន៍ថា "ខ្ញុំសង្ឃឹមថា នឹងគ្មាន (ភេរវករនៅក្នុងប្រទេសកម្ពុជា)ទៀតទេ" ដោយលោកបន្ថែមថា រដ្ឋាភិបាលបានបង្ហាញឲ្យឃើញយ៉ាងច្បាស់ថា ប្រទេសកម្ពុជាមិនមែនជា "ជម្រកលាក់ខ្លួន" សម្រាប់ឧក្រិដ្ឋជនឡើយ ។

"នៅពេលយើងដឹងថា ភេរវករស្ថិតនៅក្នុងប្រទេសរបស់យើង យើងនឹងចាត់វិធានការភ្លាម" ៕ K

# មេចលនា CFF ជាប់អន្ទាក់ ហ៊ុន សែន

ដោយ ពិន សំខុន

•••មេចលនា "ប្រយុទ្ធដើម្បីសេរីភាពនៅកម្ពុជា" ឈ្មោះ ឈុន យ៉ាសិទ្ធ បានត្រូវតុលាការនៅឡូសអង់សឺលេស រដ្ឋកាលីហ្វ័រញ៉ា កាត់ទោសឱ្យជាប់គុកមួយជីវិត កាលពីថ្ងៃអង្គារ ទី២២ មិថុនា ឆ្នាំ២០១០ ដោយសារសកម្មភាពប្រដាប់អាវុធក្នុងបំណងរំលំរបប ហ៊ុន សែន ។

ឈុន យ៉ាសិទ្ធ អាយុ ៥៣ឆ្នាំ មកដល់សហរដ្ឋអាមេរិកកាលពីឆ្នាំ ១៩៨០ ជាម្ចាស់នៃហាងគណនេយ្យករមួយនៅឡុងប៊ិច ។ តាំងពីមកដល់លោកមានបំណងយ៉ាងប្តូរផ្តាច់ចង់ប្តូររបបនៅកម្ពុជា ឱ្យមានដំណើរដូចនៅសហរដ្ឋអាមេរិក ដោយចូលរួមក្នុងចលនានយោបាយប្រឆាំងនឹងរបបកុម្មុយនិស្ត-របបរាជានិយម និងរបបផ្តាច់ការដែលដឹកនាំដោយ ហ៊ុន សែន នៅភ្នំពេញ ។ ចុងក្រោយបង្អស់ ឈុន យ៉ាសិទ្ធ បានបង្កើតចលនាប្រដាប់អាវុធមួយឈ្មោះ Cambodia Freedom Fighter ហើយបានវាយប្រហារនៅទីក្រុងភ្នំពេញម្តងនៅថ្ងៃទី២៤ វិច្ឆិកា ២000 ដែលសកម្មភាពនេះ ពុំបានស្ទាត់កំបាំងពីអាជ្ញាធរភ្នំពេញ ដែលត្រៀមទទួលការវាយប្រហារនោះ ហើយដាក់អន្ទាក់យ៉ាងឆ្លាតវៃ ។ នារាត្រីថ្ងៃទី២២ វិច្ឆិកា ឆ្នាំ២000នោះ ទោះជាមានការណែនាំមិនឱ្យប្រើអាវុធពីសំណាក់ចាស់ទុំ CFF ក្តី ឈុន យ៉ាសិទ្ធ ប្រចាំការនៅអារញ្ញប្រាថេត បានបញ្ជាឱ្យមានការវាយប្រហារមួយ ដែលមានឈ្មោះថា "បេសកកម្មភ្នំភ្លើង" នាម៉ោង ៤ ទៀបភ្លឺ ចេញពីចំណតរថភ្លើង (នេះជាសេចក្តីរាយការណ៍របស់ ឈុន យ៉ាសិទ្ធ ផ្តល់ឱ្យវិទ្យុអាស៊ីសេរី នាពេលនោះ) តែការវាយប្រហារបែរជាផ្ទុះ ៥ម៉ោងមុនកាលកំណត់ផុតពីការគ្រប់គ្រងដោយដៃ ឈុន យ៉ាសិទ្ធ អស់រលីងបណ្តាលឱ្យមានការចាប់មនុស្សដែលត្រៀមខ្លួននៅចំណតរថភ្លើងបានទាំងអស់ ហើយថែមទាំងចាប់មនុស្សផ្សេងៗទៀតប្រមាណ ១០០នាក់ទៀតផង ។ ឈុន យ៉ាសិទ្ធ នៅតែទាមទារថា ការវាយប្រហារនាម៉ោង១១យប់នោះជារបស់ខ្លួនដដែល ដែលជាហេតុធ្វើឱ្យ ឈុន យ៉ាសិទ្ធ ទទួលទោសប្រឆាំងនឹងច្បាប់សហរដ្ឋអាមេរិកយ៉ាងជាក់ស្តែង ។

កាសែត ឡូសអង់សឺលេស បានរាយការណ៍ថា លោករដ្ឋមន្ត្រីការបរទេស ហោ ណាំហុង បានសំដែង "ការកោតសរសើរដល់រដ្ឋាភិបាលអាមេរិកាំង ដែលបានដាក់ទោសដល់ ឈុន យ៉ាសិទ្ធ នេះនឹងជួយទប់ស្កាត់សកម្មភាពភេរវកម្មនៅកម្ពុជា" ។

ចៅក្រម ឌីន ព្រីគីសុន បាននិយាយប្រាប់អ្នកកាសែតថា "ខ្ញុំមិនជឿថា ឈុន យ៉ាសិទ្ធ ជាបិសាច រូបរាងមនុស្សនោះទេ ។ តែគាត់មានជីវិតកំសត់ ហើយគ្មានសំណាងដោយបានកើតនៅកន្លែងមួយដែលហេតុភេទគួរឱ្យភ័យខ្លាចកើតនៅទីនោះ" ។

ចំណែកឯមេធាវីរបស់ ឈុន យ៉ាសិទ្ធ ឈ្មោះ រីក កាឡាហាន់ "កូនក្តីរបស់ខ្ញុំមានបំណងតែមួយ គឺនាំលទ្ធិប្រជាធិបតេយ្យទៅជូនមាតុប្រទេស" ហើយបន្តថា "មានកំហុសដឹកនាំ និងឆោតល្ងង់នៅលើការប្រព្រឹត្តក៏មែនហើយ ក៏ប៉ុន្តែគ្មានកំហុសដឹកនាំ និងឆោតល្ងង់នៅលើបំណងរបស់គេទេ "លោក កាឡាហាន់ បានបញ្ជាក់ថា "គឺជាការខិតខំដ៏គួរឱ្យគោរពរបស់កូនក្តីខ្ញុំ ដើម្បីជួយកម្ពុជាឱ្យរួចផុតពីរបបធ្វើបាបមនុស្សរបស់ ហ៊ុន សែន ។



ឈុន យ៉ាសិទ្ធ

ក្រៅពីព្រឹត្តិការណ៍ដែលកើតពីទស្សនៈ នយោបាយ CFF បានក្លាយជាចលនាប្រឆាំងនឹងរបបភ្នំពេញយ៉ាងខ្លាំង និងយ៉ាងចំហរក្នុងរយៈពេល ១០ឆ្នាំចុងក្រោយនេះ ហើយមានទេសចរខ្មែរ ដែលចង់មករស់នៅ ស.រ.អា នេះបានប្រើប្រាស់កេរ្តិ៍ឈ្មោះនេះ សម្រាប់សុំសិទ្ធិជ្រកកោនច្រើនគ្នា ។

យើងនៅមិនទាន់ទទួលប្រតិកម្មពីសមាជិក CFF ឯទៀតៗពីអ្នកដែលមានសិទ្ធិជ្រកកោន CFF យ៉ាងណានៅឡើយទេ តែយើងដឹងថា អ្នកដែលពុំបានទទួលសិទ្ធិជ្រកកោនដោយសារ CFF ឯណោះ បានទៅផ្តល់ជំនួយឯកសារ ជាសាក្សី ជាបុព្វហេតុដំបូង ដែលនាំឱ្យក្រសួងមហាផ្ទៃភ្នំពេញរៀបចំឯកសារឱ្យអាចចាប់ខ្លួន ឈុន យ៉ាសិទ្ធ ដោយក្រសួងប៉ូលិសអាមេរិកាំង រហូតដល់មានរឿងប្តឹងប្តល់ជាភេរវករជាបន្តទៅទៀតបាននោះ ៕

# អាថ៌កំបាំង និងសិល្បៈនៃជីវិត
# SECRET AND ART OF LIVING



(តមកពីលេខមុន)

រៀបរៀងដោយ
លោក ម៉ៅ ច័ន្ទសំណុំ

•••ខ្ញុំសូមលើកឧទាហរណ៍មួយមកបញ្ជាក់ជូនលើចំណុចនេះ : មនុស្សម្នាក់ដើរតាមផ្លូវងងឹតប្រទះឃើញរបស់មួយវែងស្ដួៗ ឋិតនៅសំកាំង ឆ្លងកាត់ផ្លូវ គាត់ភ័យណាស់ ស្រែកថា ពស់ វើយប្រយ័ត្ន!! មិត្តគាត់នៅជិតនោះ ចុចពិលបំភ្លឺ ទើបដឹងថាជាខ្សែពួរសោះ ។ ពេលដែលមើលខ្សែពួរពុំមានភ្លើងពិល គាត់កំណត់ថាខ្សែពួរពិតជាពស់ ជាពស់ប្រាកដមែន កើតអារម្មណ៍ភ័យខ្លាចពិតប្រាកដមែន នេះជាសច្ចៈមួយ ។ លុះដំណាក់កាលទី២ ក្រោមពន្លឺរស្មីភ្លើងពិល គាត់ដឹងពិតប្រាកដថា នេះជាខ្សែពួរ ពុំមែនជាពស់ទេ ពេលនេះលេញចេញជាការពិតមួយទៀតមានកិរិតដាច់ខាត Absolute truth ។ ការយល់ដឹងលើកមុននេះ ជាការភាន់ច្រឡំ Delusion ប៉ុណ្ណោះ ឬក៏ជាការពិតដែរ តែជាការពិត "ដែលមានទំនាក់ទំនង" Relative truth ។

- សច្ចៈដាច់ខាត មានចរិកជាអនន្ត Eternity (ភាពអនន្ត ភាពគ្មានទីបំផុត) : ពិនិត្យឧទាហរណ៍អំពីទឹកឡើងវិញ សច្ចៈដាច់ខាតគឺ $H_2O$ ។ ម៉ូលេគុល $H_2O$ ណាមួយដែលអត្ថិភាពក្នុងធម្មជាតិ ហើយវាមានអត្ថិភាព ជាអនន្ត គ្មានទីបំផុត គ្មានកន្លែងចាប់ផ្ដើម គ្មានទីបញ្ចប់ គ្មានកើត គ្មានស្លាប់ ។ ចូរពិនិត្យទឹកមួយដំណក់ ដែលអ្នកផឹកចូលទៅក្នុងពោះ អ្នកគិតថា វារលាយបាត់ទៅក្នុងខ្លួនអ្នកហើយ តាមពិតវាពុំបាត់ទៅណាទេ វាចេញមកក្រៅតាមទឹកនោម តាមលាមក វាអាចហូរចូលលូទឹកស្អុយ ហូរចូលទៅទន្លេបឹងបួរ អាចកកជាទឹកកក (បើរដូវត្រជាក់មកដល់ ហើយអាចរលាយជាទឹកធម្មតាឡើងវិញ (បើរដូវក្ដៅមកដល់) ហើយវាអាចហូរចាក់ទៅសមុទ្រ នៅទីនោះក្រោមកំដៅព្រះអាទិត្យ វាអាចហួតជាចំហាយហើរឡើងទៅលើអាកាស ករបានជាពពកខ្មៅ ត្រូវខ្យល់ផាត់ធ្លាក់ភ្លៀងមកដីវិញ ។ ជួនកាលវាអាចទទួលការចម្រាញ់ជាទឹកស្អាត ហើយអ្នកអាចហូបឡើងវិញក៏បាន ។ $H_2O$ នេះឋិតថេរ អត្ថិភាពជានិច្ចតរៀងទៅ គ្មានកើត គ្មានស្លាប់ ថ្វីត្បិតតែវាមានការប្រែរូបភាពខ្លះៗ ជាទឹករាវ ជាទឹកកក ជាចំហាយទឹកក៏ដោយ ។ ការប្រែប្រួលនេះ គឺប្រព្រឹត្តទៅតាមលក្ខខណ្ឌខាងក្រៅប៉ុណ្ណោះ ចំណែកឯ $H_2O$ នៅតែជា $H_2O$ ពុំមានប្រែប្រួលឡើយនៅជាអនន្ត អមតៈ ។

អ្នកវិទ្យាសាស្ត្រខ្លះបានអះអាងថា បរិមាណនៃថាមពលក្នុងចក្រវាឡយើងនេះមានចំនួននឹងដដែល ពុំប្រែប្រួលឡើយ អ្វីដែលប្រែប្រួលគឺ រូបភាពនៃថាមពលប៉ុណ្ណោះ ។ ឧទាហរណ៍ ទឹកនេះឯង $H_2O$ នៅតែជាទឹក $H_2O$ ពុំមានប្រែប្រួលឡើយ នៅជាអនន្ត អមតៈ ប៉ុន្តែទឹកវាអាចប្រែរូបជាទឹករាវ ទឹកកក ឬចំហាយទឹក ។

- រូប Form និងអរូប Formless : $H_2O$ មានចរិកដាច់ខាត ពុំមានរូបឡើយ ចំណែកឯ ទឹករាវ ទឹកកក ចំហាយទឹក ដែលមានចរិក "ដែលមានទំនាក់ទំនង" ទើបមានរូបរាង យើងអាចដឹងតាមវិញ្ញាណបាន ដូចជា អាចមើលឃើញ អាចប៉ះពាល់បាន ។

- មួយ One និងច្រើន Many : ទឹករាវ ទឹកកក ចំហាយទឹក វាជាទឹកទាំងអស់ វាបានត្រូវបង្កើតឡើងអំពីទឹកទាំងអស់ (វាជា $H_2O$ ទាំងអស់) ។ ទឹករាវ ទឹកកក ចំហាយទឹក វាទាំងអស់នេះគ្រាន់តែជាការផ្លាស់ប្ដូររូបភាពប្លែកៗតែប៉ុណ្ណោះ វាគ្រាន់តែទទួលឈ្មោះផ្សេងៗប៉ុណ្ណោះ ធាតុពិត វាជា $H_2O$ ។ ដូច្នេះ $H_2O$ (សភាពពេញលេញ) មានតែមួយ ហើយវាបែងភាគជារូបច្រើន ជាឈ្មោះច្រើន (មានសភាពជាទំនាក់ទំនង) ។ រូបភាពច្រើន ឬឈ្មោះច្រើន វាគ្រាន់តែជាទិដ្ឋភាពខាងក្រៅនៃវត្ថុពិត មានពិត ទឹកតែមួយគត់ ដែលជាឫសគល់ដើម ។ នេះជាការបែងភាគនៃធម្មជាតិ មនុស្សយើងមើល និងរស់នៅជាមួយតែនឹងសំបកក្រៅនេះ យើងកំណត់តាមវិញ្ញាណថា របស់ទាំងអស់នោះ ជារបស់ពិត តែវាជាវត្ថុបំភាន់ភ្នែកសោះ ។

**(ខ) ដី និងវត្ថុធ្វើអំពីដី :**

សូមពិនិត្យវត្ថុធ្វើអំពីដី វត្ថុទាំងអស់នោះមានដូចជា : ឆ្នាំងដី ចង្ក្រានដី ក្អមដី ថូផ្កាដី ចានដី រូបចម្លាក់តុបតែងធ្វើអំពីដី កែវដី ។ល។ ឆ្នាំង ចង្ក្រាន ក្អម ថូផ្កា ចាន រូបចម្លាក់ កែវដី របស់ទាំងនេះ សុទ្ធតែជារបស់មានរូបជាក់ស្ដែង From នឹងមានឈ្មោះ Name ។ ធាតុដីឋិតនៅក្នុងវត្ថុទាំងអស់នោះ ដីនេះជាតួ មានពិត គ្មានរូប គ្មានទ្រង់ទ្រាយ អរូបីយ Fromless និងមានភាពពេញលេញ Absolute ។ ធាតុដីនេះមានពិតក្នុងវត្ថុនោះ ប៉ុន្តែជាក់ស្ដែងគេពុំដែលទឹកគិតដល់ធាតុដីនេះទេ គំនិតមនុស្សផ្ដោតទៅលើតែវត្ថុមានរូបហើយ ហៅរត់មាត់ថា ឆ្នាំង ចង្ក្រាន ក្អម ថូផ្កា រូបចម្លាក់ កែវ ។ បើវត្ថុទាំងអស់នោះរលាយបាត់រូប វានឹងក្លាយទៅជាដីវិញ ។ វត្ថុមានរូបទាំងអស់នោះ មានចរិក "ដែលមានទំនាក់ទំនង" Relative ។ ចំណែកដីខ្លួនឯងនេះ ពុំបាត់ទៅណាឡើយ វាជាមូលដ្ឋានគ្រឹះ ឬជាបុព្វហេតុ Base or fundamental principle Or the primary cause ។ បើគ្មានដី គឺគ្មានរបស់ទាំងអស់នោះឡើយ ។ ប៉ុន្តែហួសពីនេះ ដីជាវត្ថុធាតុដើម សំរាប់រាប់រយជំពូកនៃវត្ថុផ្សេងៗទៀត ។ មានន័យថា គេអាចយកដីទៅធ្វើជាវត្ថុរាប់រយមុខ ។ មានន័យម្យ៉ាងទៀត ថាដីបង្កប់នូវសក្ដានុពល Potentiality ។

**(គ) ពន្លឺ និងរូបភាព :**

នៅប្រទេសកម្ពុជាយើង ក្នុងអំឡុងឆ្នាំ១៩៦០ មកទល់នឹងឆ្នាំ១៩៧០ គេបានបញ្ចាំងកុនឱ្យសាធារណជនមើលកណ្ដាលវាល ។ ម៉ាស៊ីនបញ្ចាំងមាន ១/ អំពូលកម្លាំងវ៉ុលខ្ពស់ Projector ដុំហ្វីលកុន motion picture film សាច់រឿងកុនទាំងមូលអាត់ទុកទីនោះសំរាប់បញ្ចាំង ។ នៅពីមុខម៉ាស៊ីននេះ គេឃើញមានក្រណាត់សំពត់ស សំរាប់ទទួលរូបភាពខ្សែរឿងកុន ដែលមនុស្សសាធារណជនមើលកំសាន្តទីនោះ ។ ពេលបញ្ចាំងអំពូល Projector បញ្ចាំងពន្លឺសច្ចាចទៅលើហ្វីល ដែលវិលរត់ញាប់រន្ថើន ហើយជះរូបភាពទៅលើផ្ទាំងសំពត់ស បង្កើតជារូបភាពចលនាដូចពិតៗតាមសាច់រឿង ។ អ្នកទស្សនាកុនមើលយ៉ាងជួកចិត្ត ។

(តទៅលេខក្រោយ)



## តមកពីទំព័រទី ០១ ក្រុមជំរឿននៅបន្តនៅឡើយ...

បានមកធ្វើបុណ្យនៅទីធ្លាវត្តដែលទើបនឹងសង់ថ្មីយ៉ាងគគ្រឹកគគ្រេងកំដរដោយសិល្បៈឆៃយ៉ាំ ទៀតផង ។

នៅទីនោះក្រុមជំរឿនដំណាង ដោយ សុបិន ថាច់ និងសមាគមខ្មែរ ដំណាងដោយ ស៊ិន ឌីស៊ុយ បានផ្សព្វផ្សាយអំពាវនាវឱ្យបងប្អូនខ្មែរ ទៅពុំទាន់បានចុះឈ្មោះជំរឿននៅឡើយ ឱ្យមកបង្ហាញខ្លួនឬ ក៏ទូរស័ព្ទផ្ដល់ព័ត៌មានឱ្យគេរាប់ឈ្មោះរបស់ខ្លួនឱ្យបានឆាប់ ពីព្រោះនៅតែពីរសប្ដាហ៍ទៀតប៉ុណ្ណោះ គេពុំអាចបន្តរាប់ឈ្មោះទៀតបានឡើយ ។

សហគមន៍ខ្មែរបានត្រូវគេពិពណ៌នាថា "បានប្រកាសចំនួនតិចជាងចំនួនពិតប្រាកដនៅរដ្ឋផេនស៊ីវេនា នេះ" ម្លោះហើយជំនួយនឹងការងារសម្រាប់សហគមន៍នេះក៏បានទទួលតិចតួចដូចគ្នាដែរ ហេតុនេះ ហើយបានជាការអំពាវនាវសំដៅទៅអ្នកដល់ភ្លេចភ្លាំងពុំបានឱ្យគេរាប់ឈ្មោះនោះ មានការរួសរាន់ ។ គេដឹងថា នាព្រឹកថ្ងៃអាទិត្យនោះ មានមនុស្សមួយចំនួនហើយដែលបានឆ្លើយតបនឹងក្រុម Consus គេរំពឹងថា ដំណឹងអំពាវនាវនេះនឹងត្រូវរីកសុសសាយ ហើយបងប្អូនខ្មែរច្រើនទៀត ចូលរួមឱ្យគេរាប់ឈ្មោះនេះគ្រប់ៗគ្នា ៕

ខ្មែរប៉ុស្ដិ៍




# ពីរដ្ឋបាលកុលសម្ព័ន្ធមករដ្ឋាភិបាលសម័យ

**ប្រែសម្រួលដោយ : ពិន សំខុន** (**តពីលេខមុន**)

• **២០ ឧសភា :** សម្ដេច សីហនុ យាងចេញពីប៉េកាំង ទៅ ព្យុងយ៉ាង ។

• **២ មិថុនា :** សម្ដេច សីហនុ ប្រកាសផ្ដាច់គ្រប់ទំនាក់ទំនងជាមួយខ្មែរក្រហម ។

•**៨ មិថុនា :** យោធាថៃ បានដឹកជនភៀសខ្លួនខ្មែរ តាមរថយន្តប៊ីស យកមកចាក់ទម្លាក់នៅជើងភ្នំដងរែក នៃតំបន់ព្រះវិហារ ក្រោមការគម្រាមដោយអាវុធ - ខ្មែរក្រហម ៤៥០០០នាក់ បានត្រូវបង្ខំឱ្យដើរកាត់ចំការគ្រាប់មីន ពេលនោះបណ្ដាលឱ្យមានការរងគ្រោះថ្នាក់រាប់ពាន់នាក់ ។

•**២៧ មិថុនា :** អគ្គសេនាធិការយោធាថៃ បានបង្កើតតំបន់ហាមឃាត់មួយនៅបាមឡិម នៅក្បែរទីក្រុងត្រាត ខេត្តចន្ទបូរី គឺនៅទីនោះហើយដែលប្រមូលផ្ដុំយោធាខ្មែរក្រហមឡើងវិញ - ជំរុំបានត្រៀមសាងសង់ឡើងសម្រាប់ជាជម្រកអង្គការដឹកនាំនៃកម្ពុជាប្រជាធិបតេយ្យ មាន : ប៉ុល ពត, នួន ជា, សុង សេន, អៀង សារី, ខៀវ សំផន ។

•**១៧-១៩** កក្កដា : ប្រ៊្វង់ស្វា ប្រួញុង នៃអង្គការកាកបាទក្រហម និង ហ្សាក់ បូម៉ុង នៃអង្គការយូនិសេហ្វ បានចូលទៅភ្នំពេញ ក្នុងបេសកកម្មពិនិត្យស្ថានភាពភ្នំពេញ រាយការណ៍ឱ្យអង្គការរបស់ពួកគេ ។

•**៣ សីហា :** អង្គការកាកបាទក្រហម និងអង្គការយូនិសេហ្វ ប្រកាសភាពអាសន្នថា ប្រជាជនខ្មែរ ២លាន ៥សែននាក់ កំពុងប្រឈមនឹងទុរភិក្សការហត់ហេវ និង ជម្ងឺ - សហគមន៍អន្តរជាតិផ្ដើមបង្កើនសកម្មភាពមនុស្សធម៌ទៅជួយកម្ពុជា ។

•**៩-១៦ សីហា :** បេសកកម្មពិនិត្យស្ថានភាពជាលើកទីពីររបស់ក្រុមកាកបាទក្រហម និងយូនិសេហ្វ នៅភ្នំពេញ ដោយនាំទៅជាមួយនូវយន្តហោះមួយគ្រឿង ផ្ទុកដោយជំនួយដល់រដ្ឋធានីខ្មែរ ។

•**១៥-១៩ សីហា :** តុលាការបដិវត្តន៍ប្រជាជននៅភ្នំពេញ បានកាត់ទោសកំបាំងមុខប្រហារជីវិតចំពោះ សាឡុតស ហៅ ប៉ុល ពត និង អៀង សារី ពីបទឧក្រិដ្ឋកម្មប្រល័យពូជសាសន៍ ។

•**២៩-៣០ សីហា :** បេសកកម្មលើកទីបីរបស់កាកបាទក្រហម និងយូនិសេហ្វ ។

•**៣១ សីហា :** កំណើតចលនារំដោះជាតិកម្ពុជាហៅ មូលីណាកា នៅតំបន់ សឹង ខេត្តបាត់ដំបូង ដោយលោកស័ក្តិបី នាវាចរ គង់ ស៊ីលាស់ និងនាយទាហានឆ័ត្រយោង ញែម សុផុន - ចលនានេះបានបង្ហាញពីទំនោរទៅខាងសម្ដេច សីហនុ ។ នៅភ្នំពេញផ្លូវយន្តហោះពីរត្រូវបានបើក គឺទៅហាណូយមួយ និងទៅព្រៃនគរមួយ ។

•**៦ កញ្ញា :** ខ្មែរក្រហមបង្កើតរណសិរ្សអ្នកស្នេហាជាតិ និហប្រជាធិបតេយ្យ ដើម្បីមហាចលនារួបរួមជាតិកម្ពុជា មានមនុស្សរាប់ពាន់នាក់ បានចូលមកដល់ អារញ្ញប្រាថេត ភាគខាងកើតនៅតំបន់តាប្រាយ៉ា ។

•**៩ កញ្ញា :** សន្និសីទនៃចលនាមិនចូលបក្សសម្ព័ន្ធ នៅទីនោះ លោក ផាំវ៉ាន់ដុក ប្រកាសថាស្ថានភាពនៅកម្ពុជា នឹងមិនត្រឡប់ក្រោយទេ - អាសនៈកម្ពុជា បានត្រូវទុកឱ្យទំនេរនៅ អ.ស.ប ។

•**២១ កញ្ញា :** មហាសន្និបាតនៃ អ.ស.ប សម្រេចថា "មានតែក្រុមខ្មែរក្រហមទេ ដែលជាតំណាងស្របច្បាប់សម្រាប់កម្ពុជា ។

•**២៤ កញ្ញា :** បវេសនកាលរបស់សិស្សជាលើកដំបូងបង្អស់បន្ទាប់ពីខែកញ្ញា ឆ្នាំ១៩៧៤ មក ។

•**២៦ កញ្ញា :** ផ្ដើមសកម្មភាពសង្គ្រោះជីវិតប្រជាជនកម្ពុជា ក្រោមទង់ជាតិកាកបាទក្រហម និង យូនិសេហ្វ ។

•**៩ តុលា :** បង្កើតរណសិរ្សរំដោះប្រជាពលរដ្ឋខ្មែរ ដឹកនាំដោយលោក សឺង សាន នៅតំបន់សុខសាន្តនៃខេត្តត្រាច ប្រទេសថៃ ។

**ឆ្នាំ ១៩៧៩**

•**១២ តុលា :** ប៉ែន សុវណ្ណ ជូននឹងប្រេស្នេវនៅមូស្គូ

•**១៣ តុលា :** ស្ពានផ្លូវអាកាសពីបាងកក នៅភ្នំពេញត្រូវបានអនុញ្ញាតបន្ទាប់ពីការចរចាយ៉ាងវែងដោយរដ្ឋាភិបាលភ្នំពេញ មានបំណងភ្ជាប់ការដឹកស្បៀងទៅនឹងការទទួលស្គាល់រដ្ឋបាលភ្នំពេញ ដោយសហគមន៍អន្តរជាតិ- ជាមួយស្បៀង និងថ្នាំសង្កូវ អ្នកកាសែតបានផ្ដល់សេចក្ដីរាយការណ៍ឱ្យពិភពលោកបានឱ្យដឹងខ្លះៗពីសោកនាដកម្មដែលបានកើតឡើងនៅក្នុងកម្ពុជា ។

•**១៤ តុលា :** រដ្ឋបាលភ្នំពេញបង្កើតនាយកដ្ឋានកាន់តែច្រើនបង្ហាញរូបរាងជារដ្ឋាភិបាលប្រក្រតីកាន់តែច្បាស់លាស់ជាងមុនៗ - យន្តហោះកាកបាទក្រហមមានសកម្មភាពភ្ជាប់ភ្នំពេញ និងបាងកករាល់ថ្ងៃ។

•**១៩ តុលា :** អង្គការកាកបាទក្រហម បានអំពាវនាវឱ្យសហគមន៍អន្តរជាតិ ជួយដល់កម្ពុជា ។

•**២០ តុលា :** បង្កើតសមាគមអ្នកសារព័ត៌មាននៃកម្ពុជាប្រជាមានិត ។

(តទៅលេខក្រោយ)



# ស្ត្រីខ្មែរដំបូងបង្អស់ដែលបានធ្វើដំណើរប្រទេសបារាំងមកភ្នំពេញតាមផ្លូវគោក



(**តពីលេខមុន**)

**ដោយ : ពិន នារីពិទូ**

•••ថ្ងៃទី២៧ ខែសីហា ឆ្នាំ២០០៦ : យើងបានទស្សនាទីក្រុង Perm ក្រោមពន្លឺថ្ងៃចែងចាំង។ Perm មានស្ថាបត្យកម្មនៃសំណង់អគារប្លែកៗ ទិដ្ឋភាពស្ពានថ្មីដែលស្ថិតនៅតាមផ្លូវ Stroite-ley ។ ពួកយើងមានការស្នាក់ស្នើរក្នុងការទៅទស្សនាសារមន្ទី Gulag ដែលមានចំងាយ៩០គីឡូម៉ែត្រ ប៉ុន្តែក្រោយមកក៏សំរេចចិត្តធ្វើដំណើរដោយថ្មើរជើងនៅតាមផ្លូវ ដើម្បីទស្សនាទីក្រុង Perm ។ សណ្ឋាគារដែលយើងស្នាក់នៅមានភាពធំទូលាយលាតសន្ធឹងវែងមានកំពស់១០ជាន់ សាងសង់ឡើងយ៉ាងសាមញ្ញ អាហារពិសេសរបស់ពួកយើងនៅទីនោះគឺ ស្រាបៀរដំល្បីឈ្មោះ Baltica, Twist និង Holsten ក្លែមជាមួយជ្រក់ត្រសក់ធំៗ និងផ្លែអូលីវដំឈ្ងុយ នាថ្ងៃខួបកំណើតរបស់ អូរេលី Aurélie ។

អ្នកដំណើរស្ត្រីទាំងពីររូប ទើបនឹងបំពេញចម្ងាយផ្លូវប៉ារីស-ភ្នំពេញ តាមផ្លូវគោកបានត្រឹមតែ ១ភាគបីតែប៉ុណ្ណោះនៅឡើយ ។ ភូមិសាស្ត្រនៅតំបន់ជាបន្តទៅទៀត ជាតំបន់ខ្ពង់រាបមានភ្នំខ្ពស់ៗ ដូចជាភ្នំអ៊ូរាល់នេះជាដើម ហើយក៏នៅមានជួរភ្នំនៃតំបន់ម៉ុងគោលីដ៏ធំៗ ហើយយ៉ាងត្រជាក់នៅខាងមុខផ្លូវនៃអ្នកដំណើរពិភពលោកទាំងពីរអ្នកទៀតផង ។

រុស្សី ដែលស្ថិតនៅខាងកើតនៃជួរភ្នំអូរ៉ាល់ Ural ដែលជាព្រំដែនបែងចែកទឹកដីរវាងអឺរ៉ុប និង អាស៊ុ ។ ក្រោមពន្លឺថ្ងៃនៃធាតុអាកាសត្រជាក់ ពួកយើងមានអារម្មណ៍រីករាយជាអនេក និងសូមថ្លែងអំណរគុណដល់ក្រុមគ្រួសារ និងមិត្តភ័ក្ត្រដែលបានជួយជ្រោមជ្រែងពួកយើងកន្លងមក។ ពួកយើងបានឈានចូលទឹកដីអាស៊ីជាផ្លូវការដោយឆ្លងកាត់ព្រំប្រទល់រវាងទ្វីបអឺរ៉ុប និងអាស៊ីក្នុងចំងាយ៤០ គីឡូ ម៉ែត្រ មុនពេលមកដល់ Yekaterinburg យើងបានទៅទស្សនាវត្តអារ៉ាម Iama Ganina ដែលមានចំងាយឆ្ងាយពីទីក្រុង១៦គីឡូម៉ែត្រ ដែលសាងសង់ធ្វើពីឈើ និងក្បាច់ចំលាក់តាមបែប


អូរេលី Aurélie និងស៊ីលវីយ៉ា Sylvia





ថ្ងៃទី២៨ ខែសីហា ឆ្នាំ២០០៦: យើងបានឆ្ពោះដំណើរនៅទិសខាងកើតឈាងខាងត្បូងនៃក្រុង Perm គឺស្រុក Kungur ដែលជាតំបន់ប្រវត្តិសាស្ត្រផ្នែកស្ថាបត្យកម្ម និងជាមជ្ឈមណ្ឌលពាណិជ្ជកម្ម ឧស្សាហកម្ម និងដឹកជញ្ជូនរបស់ប្រទេសរុស្សី ។ យើង បានកក់បន្ទប់នៅសណ្ឋាគារ Stalagmite ដែលមានតំលៃ ២០យូរ៉ូក្នុងមួយយប់ ក្នុងបំណងទៅទស្សនាបឹងទឹកកកដ៏ល្បីឈ្មោះ ពួកយើងបានចំណាយពេលមួយម៉ោងកន្លះដើម្បីទស្សនាស្ថាបត្យកម្មធ្វើពីទឹកកកនេះ។

ថ្ងៃទី២៨ ខែសីហា ឆ្នាំ២០០៦ : យើងបានមកដល់ Yekaterinburg ជាទីក្រុងធំលំដាប់ទីប្រាំរបស់ប្រទេសប្រពៃណីរបស់ប្រទេសនេះ ជាទីកន្លែងសក្ការៈគោរពបូជានៃប្រជាជនរុស្សី ហើយក៏ជាកន្លែងដែលបានបន្សល់នូវរឿងរ៉ាវរបស់ជនជាតិរ៉ូមែននូវ Romanov ដែលត្រូវបានសំលាប់នៅក្នុងឆ្នាំ ១៩១៨ ។ ទោះបីជាធាតុអាកាសត្រជាក់ឈ្ងលច្រមុះយ៉ាងណាក៏ដោយ ពួកយើងនៅតែអាចធ្វើដំណើរទៅមុខដោយថ្មើរជើង ដើម្បីទស្សនាទីក្រុងនេះ ពួកយើងដើរគ្រប់ច្រកល្ហកដោយចំណាយអស់រយៈពេលបីម៉ោង ពួកយើងមានការចាប់អារម្មណ៍យ៉ាងខ្លាំងទៅលើស្ថាបត្យកម្មប្លែកៗ នៃសំណង់អាគារ ព្រះវិហារ និងរូបចំលាក់ លេនីន ។

(**តទៅលេខក្រោយ**)

# សិក្ខាសាលាស្ដីពីជាតិខ្មែររុងរឿង



**ដោយ : រស់ យ៉ឺន**

•••នៅវត្តពោធិវង្ស ប្រទេសបារាំងកាលពីថ្ងៃទី២២ ខែមិថុនា មានធ្វើសិក្ខាសាលាមួយខ្មែររុងរឿង ហើយដែលមានអន្តរាគមន៍របស់ភិក្ខុ ងិន ភេន ឥន្ទប្បញ្ញោផង ។

នៅក្នុងបុព្វកថារបស់ភិក្ខុអង្គនោះបានថ្លែងថា មនុស្សយើងមិនដូចសត្វទេ ។ សត្វប្រភេទខ្លះដូចជាអណ្ដើកកើតមកមិនបាច់ពឹងម៉ែ-ឪទេ អាចរស់ដោយខ្លួនឯង ។ មនុស្សមិនដូច្នោះទេ ត្រូវពឹងម៉ែ-ឪ ទើបអាចរស់បាន ។ សត្វកើតមក ចេះដើរ ចេះហើរ ចេះរកស៊ី ចេះជួយខ្លួនឯង ។ ឯមនុស្សយើងកើតមកចេះត្រឹមតែយំ យំប្រាប់ទុក្ខលំបាក យំសុំឱ្យគេជួយ។

បើគេមើលឃើញចំណុចត្រង់នេះ មនុស្សយើងហាក់ដូចជាអន់ជាងសត្វ ប៉ុន្តែពេលវេលាកន្លងទៅៗ មនុស្សកាន់តែឆ្លាត កាន់តែចេះ ផុយពីសត្វ ព្រោះមនុស្សចេះសង្កេត ចេះរៀនសូត្រ ចេះបណ្ដុះបញ្ញា... ឯសត្វនៅតែដដែល ។ មនុស្ស ជាសត្វអប់រំបាន ។

មនុស្សយើងមិនអាចរស់នៅតែម្នាក់ឯងបានទេ ។ នរណាអាចលើករបស់ធំៗធ្ងន់ៗតែម្នាក់ឯងបាន ? នរណាអាចផលិតគ្រឿអឧបភោគបរិភោគគ្រប់មុខតែម្នាក់ឯងបាន ?

ចម្លើយឆ្លើយថា គ្មានមនុស្សណាអាចធ្វើអ្វីតែម្នាក់ឯងបានទេ ។ ហេតុនេះមនុស្សយើងត្រូវរៀនទាក់ទងគ្នា ត្រូវចេះជួយគ្នា ត្រូវតែដឹងគុណគ្នា និងត្រូវចេះរស់នៅដោយមេត្តា ករុណាធម៌ ជាសុខដុមរមនាជាមួយគ្នា ។

ខ្មែរយើងជាជាតិមួយឆ្លាត មានវប្បធម៌ អរិយធម៌ខ្ពង់ខ្ពស់ មុនគេនៅតំបន់អាស៊ីអាគ្នេយ៍នេះ។ យើងមានក្បួនខ្នាត ច្បាប់ទម្លាប់ សណ្ដាប់ធ្នាប់ ប្រពៃណី និងសាសនារបស់យើង ។ ខ្មែរយើងទោះបីគេទៅរស់នៅទីកន្លែងណាក៏ដោយ គេមិនបោះបង់ចោលពូជសាសន៍ ទំនៀមទម្លាប់ ប្រពៃណីល្អជាសញ្ញាលក្ខណ៍របស់ជាតិខ្មែរទេ។

ទឹកដល់រឿងអស់នេះហើយដែលបុព្វបុរសយើង-រៀមច្បងរបស់យើង បានរួមគ្នាបង្កើតសមាគមឧបត្ថម្ភពុទ្ធសាសនាខ្មែរ បានកសាងវត្តពោធិ៍វង្សបានទំនុកបំរុង ឧបត្ថម្ភរហូតបានរីកចំរើនរុងរឿងដូចយើងបានឃើញសព្វថ្ងៃនេះ។

**ជំនឿ និងសាសនាខ្មែរ មានការវាយតម្លៃសាសនាខុសៗគ្នាដូចតទៅ :**

ខ្មែរយើងពីដើមមិនបានវាយតម្លៃសាសនាទេ គេជឿតាមម៉ែ-ឪ។

-ខ្មែរសព្វថ្ងៃនេះ ចេះវាយតម្លៃសាសនា តាមរបៀបបរទេស។

-ទី ១ ខ្មែរត្រូវតែកាន់សាសនាខ្មែរ គឺនាងគង្ហីងនឹងក្រពើ-មិនត្រូវកាន់សាសនាមកពីស្រុកឥណ្ឌាទេ។

-ទី ២ សាសនាព្រាហ្មណ៍ប្រើភាសាសំស្ក្រឹតជាសាសនាល្អស្លូតមិនបៀតបៀនសាសនាដទៃ ហើយជួយឱ្យស្រុកបានសុខចំរើន។

-ទី ៣ ពុទ្ធសាសនាមហាយាន(អាចារិយវាទ) ក៏គ្រាន់បើគួរសមដែរព្រោះបានជួយស្រុកខ្មែរឱ្យបានសុខចំរើន។

-ទី៤ ចំណែកឯពុទ្ធសាសនា(ថេរវាទ)ហីនយានប្រើភាសាបាលី ជាសាសនាអាក្រក់បៀតបៀនសាសនាដទៃធ្វើស្រុកឱ្យហិនហោចវិនាសរហូតសព្វថ្ងៃ។

ក្នុងការវាយតម្លៃសាសនានេះ ខ្ញុំគ្រាន់តែធ្វើដំណាកស្រង់តែប៉ុណ្ណោះ សុំលោកអ្នកអានមេត្តាពិចារណាថ្លឹងថ្លែង ទៅតាមការយល់ឃើញ នឹងសូមសម្បទានតម្រិះប្រាជ្ញាផង។

ដោយឡែកភិក្ខុ ងិន ភេន ឥន្ទប្បញ្ញោ ដែលគង់នៅវត្តពោធិ៍វង្ស ប្រទេសបារាំង បានលើកហេតុផលពីរយ៉ាងក្នុងបរិបទមួយដែលហៅថា ជាតិខ្មែរចុះអាប់ឱន។

ជាតិខ្មែរចុះអាប់ឱនមានពីរយ៉ាងគឺ :

១-ហេតុខាងក្នុងគឺ :

ក-ការគ្រប់គ្រងមិនល្អ លោក ត្រឹង ងា សរសេរទុកក្នុងសៀវភៅ អរិយធម៌ខ្មែរថា រចនាសម្ព័ន្ធ សក្តិភូមិបណ្តាលឱ្យមានការច្រណែននិន្ទា ឈ្នានិះ ដោយមានអំពើពុករលួយ និងអយុត្តិធម៌ក្នុងសង្គមគ្រប់យ៉ាង ហើយជាពិសេសបណ្តាលឱ្យមានអស្ថិរភាពក្នុងផ្នែកនយោបាយនេះឯង។

អ្នកដឹកនាំមានអំណាចធំទូលាយគ្មានព្រំដែនមិនសូវប្រកបដោយទសពិតរាជធម៌ គិតតែប្រយោជន៍ផ្ទាល់ខ្លួនជាងប្រយោជន៍ប្រទេសជាតិ។

ខ-សាសនាទាំងឡាយមិនចេះរស់នៅជាមួយគ្នា។

ភិក្ខុ ងិន ភេន បញ្ជាក់ថា បើតាមការយល់ឃើញរបស់លោកផ្ទាល់ ជម្លោះសាសនាមិនធំដល់ថ្នាក់ច្បាំងគ្នាទេ វាគ្រាន់តែជារឿងរបស់អ្នកដឹកនាំថ្នាក់លើនិងពួកអាម៉ុ អាថោង តែប៉ុណ្ណោះ។

ឯប្រជាជនគេអត់រវីករវល់អី-មិនប្លែកអីពីរឿងសព្វថ្ងៃនេះទេ ។ សព្វថ្ងៃនេះស្រុកខ្មែរវាជារឿងរបស់ហ៊ុន សែន នឹងបក្សពួកមិនមែនជារឿងសាសនា ឬប្រជាជនទេ។

២-ហេតុដែលកើតឡើងខាងក្រៅ គឺសៀមចូលមកលុកលុយដោយមានចិនជួយឧបត្ថម្ភស្ងាត់ៗផង។

ទាំងនេះជាទស្សនៈរបស់ភិក្ខុ ងិន ភេន លោកអ្នកអានអាចវាយតម្លៃចុះ ខ្ញុំគ្រាន់តែឆ្លៀតឱកាសផ្តល់មតិថា : ប្រទេសជាតិនីមួយៗនៅលើសកលលោក ដែលអាចលូតលាស់រីកចំរើនទៅបាននៅសម័យនេះ គឺអាស្រ័យដោយធនធានមនុស្សដែលមានបច្ចេកវិជ្ជា(Science Technologie)គួបផ្សំនឹងធនធានធម្មជាតិផង បូកនឹងសង្គមសាមគ្គីធម៌ផង-សេដ្ឋកិច្ច និងកសិឧស្សាហកម្មផង។

ឯរឿងជំនឿនិងសាសនា ខ្មែរម្នាក់ៗគួរតែទុកក្នុងបេះដូងរៀងៗខ្លួនជាការប្រសើរ.... ៕

ហោរាសាស្ត្រ

# ជោគជតារាសីលោកអ្នក ថ្ងៃទី១៦-២៩ កក្កដា ២០១០



**ឆ្នាំជូត : (ពពួកទេព្តាប្រុស ធាតុទឹក)**

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អណាស់ ។ ក្នុងរយៈពេលនេះ លោកអ្នកត្រូវវៀសវៃញាប់ជើងញាប់ដៃបន្តិច តែចូរកុំមានចិត្តលោភលន់ដោយចង់មានចង់បានឲ្យហួសប្រមាណពេក ប្រយ័ត្នបែរជាកើតរឿងរ៉ាវអាចបង់ខាតលាភសក្ការៈវិញ ។ ចំពោះគូស្វាមីភរិយាក្នុងរយៈពេលនេះមានសុភមង្គលល្អណាស់នៅក្នុងគ្រួសារ ៕

**ឆ្នាំឆ្លូវ : ( ពពួកមនុស្សប្រុស ធាតុដី )**

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ ថ្វីត្បិតតែមានភោគផលចំណូលហូរចូលច្រើនគួរសមក្តី តែពុំមានសល់អ្វីជាដុំកំភួនឡើយ ព្រោះចាយវាយខ្ជះខ្ជាយខ្លាំងពេក ហើយក៏មិនខុសពីទូកធំក្តោងធំនោះដែរ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះទាល់តែបេះអត់ឱនឲ្យគ្នា ទើបមិនអាចប្រេះឆាគ្នាបាន ៕

**ឆ្នាំខាល : ( ពពួកយក្សស្រី ធាតុឈើ )**

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងឧបសគ្គច្រើន ។ ក្នុងរយៈពេលនេះ ដោយសារតែយីអ៊ិនកំពុងតែដាក់ស្រាប់នោះ ដូច្នេះលោកអ្នកមិនត្រូវហ៊ានប្រថុយប្រថានក្នុងការបណ្តាក់ទុនរកស៊ីដោយទ្រង់ទ្រាយធំ ឬក៏ប្រព្រឹត្តល្បែងស៊ីសងឡើយប្រយ័ត្នភ្លាត់ស្នៀតអាចវិនាសអន្តរាយទ្រព្យអស់រលីងពីខ្លួន ។ ចំពោះគូស្វាមីភរិយាក្នុងរយៈ ពេលនេះមានរឿងរកាំរកូសច្រើន ៕

**ឆ្នាំថោះ : ( ពពួកមនុស្សស្រី ធាតុឈើ )**

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខដោយសន្សឹម។ ។ ក្នុងរយៈពេលនេះ អ្វីដែលលោកអ្នកត្រូវយកចិត្តទុកដាក់នោះ គឺមុននឹងហាមាត់និយាយស្តីអ្វីត្រូវបេះប្រយ័ត្នប្រយែងក្រែងមានពាក្យសម្តីភ្លាំងភ្លាត់ប៉ះសិទ្ធិអ្នកដទៃ អាចបង្កជារឿងទំនាស់ឥតប្រយោជន៍ ។ ចំពោះស្ត្រីភេទក្នុងរយៈពេលនេះ មិនត្រូវដើរផ្លូវឆ្ងាយដាច់សង្វែងតែម្នាក់ឯងឡើយ ៕

**ឆ្នាំរោង : (ពពួកទេព្តាប្រុស ធាតុមាស)**

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបកិច្ចការងារអ្វីក៏ដោយ គឺរមែងតែងតែបានទទួលផលសម្រេចសមតាមបំណងប្រាថ្នាទាំងអស់ ។ ក្នុងរយៈពេលនេះ បុរសត្រូវប្រយ័ត្នចំពោះមនុស្សស្រីដែលមានសម្តីផ្អែមត្រជាក់អាចរលាយទ្រព្យធាប់ ។ ចំពោះគូស្នេហ៍ប្រកបតែសេចក្តីសុខក្សេមក្សាន្ត ៕

**ឆ្នាំម្សាញ់ : (ពពួកមនុស្សប្រុស ធាតុភ្លើង)**

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបបញ្ហាលំបាក។ច្រើន ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបកិច្ចការងារអ្វីក៏ដោយ ចូរមានការប្រុងប្រយ័ត្នជាប់ជានិច្ច ជាពិសេសចំពោះអ្នកជំនួញជួញដូរមុននឹងប្រគល់ ឬទទួលនូវមុខទំនិញសព្វសារពើត្រូវបេះពិនិត្យមើលគុណភាព និងរាប់ចំនួនឲ្យបានត្រឹមត្រូវទើប មិនចាញ់បោក គេ ។ ចំពោះគូស្នេហ៍ រយៈពេលនេះច្រើនពាក់មុខយក្សដាក់គ្នា ៕



**ឆ្នាំមមី : (ពពួកទេព្តាស្រី ធាតុភ្លើង)**

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងរឿងរកាំរកូសច្រើន ។ ក្នុងរយៈពេលនេះ លោកអ្នកនឹងបានជួបរឿងឈ្លោះវិវាទមួយហើយមួយទៀតឥតឈប់ឈរ ។ ដូច្នេះចូរបេះរម្ងាប់ចិត្តឲ្យបានត្រជាក់ដាច់ខាតមិនត្រូវតបតទាំងកំហឹងទល់នឹងកំហល់ឡើយ ទើបរឿងតូចមិនអាចក្លាយជារឿងធំបាន ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះមិនសូវចុះសម្រុងនឹងគ្នាទេ ៕

**ឆ្នាំមមែ : (ពពួកទេព្តាស្រី ធាតុមាស)**

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ ថ្វីត្បិតតែមានភោគផលចំណូលហូរចូលច្រើនគួរសមក្តី តែពុំមានសល់អ្វីជាដុំកំភួនឡើយ ព្រោះចាយវាយខ្ជះខ្ជាយខ្លាំងពេកហើយក៏មិនខុសពីទូកធំក្តោងធំនោះដែរ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះទាល់តែបេះអត់ឱនឲ្យគ្នាទៅវិញទៅមកទើបមិនអាចប្រេះឆាគ្នាបាន ៕

**ឆ្នាំវក : (ពពួកយក្សប្រុស ធាតុដែក)**

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះ លោកអ្នកមានអារម្មណ៍ភ្លឺថ្លាគំនិតប្រាជ្ញាឈ្លាសវៃ បើបានជួបពិគ្រោះពិភាក្សាការងាររកស៊ីនឹងឆាប់និយាយត្រូវរ៉ូវ និងមានការចុះសម្រុងនឹងគ្នា ។ ចំពោះអាជីវករនឹងមានទំនិញលក់ចេញទិញចូលឥតទំនេរដៃ ព្រមទាំងមានភោគផលកម្រៃហូរចូលច្រើនទៀតផង៕

**ឆ្នាំរកា : (ពពួកយក្សប្រុស ធាតុដែក)**

រាសីលោកអ្នកល្អមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខដោយសន្សឹម។ ។ ក្នុងរយៈពេលនេះ លោកអ្នកបានប្រកបការងារអ្វីក៏ដោយ ចូរកុំធ្វេសប្រហែសឲ្យសោះ ជាពិសេសមុនពេលចុះហត្ថលេខា ឬផ្តិតមេដៃលើលិខិតស្នាមផ្សេង។ ចូរពិនិត្យល្អិតល្អន់ ប្រយ័ត្នបង់ខាតទ្រព្យច្រើន ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះ ទាល់តែបេះអត់ឱនឲ្យគ្នាទៅវិញទៅមកទើបទទួលបានសេចក្តីសុខ ៕

**ឆ្នាំច : ( ពពួកយក្សស្រី ធាតុដី )**

រាសីលោកអ្នកល្អមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខដោយសន្សឹម។ ។ ក្នុងរយៈពេលនេះ បើមានបងប្អូនញាតិមិត្តស្គាត់មកបបួលរកស៊ីចូលហ៊ុនជាមួយ តោងបេះត្រិះរិះពិចារណាឲ្យបានល្អិតល្អន់ទើបមិនចាញ់បោកគេ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះប្រសិនបើបានស្គាល់ចិត្តថ្លើមគ្នាហើយ គឺអាចគិតគូររឿងអាពាហ៍ពិពាហ៍បាន ៕

**ឆ្នាំកុរ : (ពពួកមនុស្សស្រី ធាតុទឹក)**

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ ក៏អាចទទួលផលសម្រេចសមតាមបំណងប្រាថ្នាទាំងអស់ ។ លោកអ្នកអាចបណ្តាក់ទុនរកស៊ី ឬក៏ចេញទៅជួញដូរផ្លូវឆ្ងាយ មិនថាផ្លូវគោក ឬផ្លូវទឹកឡើយ គឺសមប្រកបតែទាំងអស់ ៕

សោភ័ណភាព



# ព្យាបាលស្បែកឱ្យសដោយប្រើផ្លែឈើ

រឿងសម្ផស្សស្រស់ស្អាតជាមួយស្ត្រី គឺជារឿងមួយដែលមិនអាចហាមឃាត់បាន ហើយពេលនេះយើងមានវិធីសំរាប់ព្យាបាលរោគស្បែក.ស មកផ្ញើជូនសាកល្បងប្រើដូចខាងក្រោមនេះ÷

-**ក្រូច** : ជាផ្លែឈើដែលមានវីតាមីន C ហើយថែមទាំងជួយសាងបំពេញបន្ថែមនូវ ខលឡាជេន ដល់ស្បែកបានយ៉ាងល្អទៀតផង ។

-**ប៉េងប៉ោះ** : ក្នុងផ្លែប៉េងប៉ោះសំបូរទៅដោយវីតាមីនដែលជួយ ពន្យារភាពជ្រីវជ្រួញមុនវ័យ ហើយថែមទាំងការពារមិនឲ្យកោសិកាចុះខ្សោយទៀតផង ។

-**ផ្លែចោម** : ក្នុងផ្លែចោមសំបូរសារជាតិភីកទីនដែលជួយឲ្យក្របក បានរឹងមាំជួយឲ្យសុខភាពល្អ និងមិនកើតរោគធាត់ ។

-**ក្រូចឆ្មារ** : មានសារជាតិវីតាមីន C យ៉ាងខ្ពស់ដែលជួយឲ្យស្បែករលីងបានយ៉ាងល្អបំផុត ។

-**ផ្លែឪឡឹក** : ជួយបំបំនពណ៌ស្បែក បញ្ចុះទោមនិងជួយលាង ក្រលៀន ។

-**ផ្លែគ្រាប់បែក** : សំបូរទៅដោយវីតាមីន C ដែលជួយដល់ប្រព័ន្ធការពាររាងកាយ ។

-**ចេកអំបូង** : វាអាចស្ថិតនៅបានយូរ ដូច្នេះស័ក្តិសមបំផុតសំរាប់អ្នកដែលកំពុងសម្រកទម្ងន់ខ្លួន ។

-**ផ្លែល្ហុង** : ស័ក្តិសមសំរាប់អ្នកក្មៀនលាមក ព្រោះផ្លែល្ហុងទុំជាឱសថបញ្ចុះ ឬបន្ធូរលាមកបានយ៉ាងល្អ ។

ប្រសិនបើចង់ឲ្យស្បែកមានសម្បុរល្អគោងព្យាយាមទទួលទានផ្លែ ឈើខាងលើនេះ ធានាថាលើកនេះស្បែករបស់អ្នកនឹងបានសរលោងស្អាតពេញចិត្តមិនខាន ៕



សោភ័ណភាព

# សក់ស្អាតដោយផ្អាប់

សំរាប់វិធីផ្អាប់សក់មានជាច្រើនសន្ធឹកសន្ធាប់ក៏ប៉ុន្តែសំរាប់ថ្ងៃនេះយើងសូមលើកយករូបមន្តផ្អាប់សក់ល្អ។មកផ្ញើជូនដោយហ៊ានធានាថា លើកនេះសក់របស់អ្នកឡើងទន់ថែមទាំងស្រស់ស្អាតយ៉ាងពេញចិត្តបំផុត ។

ចំពោះវត្ថុធាតុដើមគ្មានអ្វីចម្លែកក្រៅពីប្រើស៊ុតមាន់ ដោយយកតែស៊ុតពណ៌ក្រហមជាមួយប្រេងម្នាក់ និងទឹកឃ្មុំ ។ ក្រោយពេលមានវត្ថុធាតុដើមសព្វគ្រប់ ហើយយកវត្ថុទាំងអស់នោះដាក់លាយបញ្ចូលគ្នាឲ្យបានល្អ ។ បន្ទាប់មកយើងយកវាផ្អាប់នៅលើសក់ក្បាលទុករហូតដល់ស្ងួត ។ ដិណាក់កាលបន្តកក់សក់តាមធម្មតា ។ ប្រសិន បើបានធ្វើបែបនេះជាប់ជាប្រចាំសក់របស់អ្នកនឹងឡើងទន់ខ្មៅរលើបរលោងគួរឲ្យចង់បបោសអង្អែលបំផុត ៕

# បបូរមាត់ឡើងទន់គួរឱ្យចង់អង្អែល

**សំរាប់វិធីមិនពិបាក តែព្យាយាមឱ្យធ្វើជាប្រចាំទើបឆាប់មើលឃើញលទ្ធផលទាន់ចិត្ត ។**

- **បបូរមាត់មានសាច់ទន់** : អ្នកគួរលាបក្រែមដែលមានជាតិប្រេង ឬវ៉ាស៊ីលីន ទៅតាមទំរង់បបូរមាត់ឲ្យបានរាល់ថ្ងៃ ដើម្បីឲ្យបបូរមាត់របស់អ្នកមានសំណើមជាប់រហូត ។ នៅមានចំណុចសំខាន់មួយទៀត ដែលមិនចាញ់គ្នានោះ គឺគួរទទួលទានទឹកឲ្យបានច្រើនដើម្បីរក្សាសំណើមពីខាងក្នុងមកវិញ ។
- **បបូរមាត់រលោង** : សុភាពស្ត្រីនាងគួរតែដុសខាត់សាច់បបូរមាត់ ដោយប្រាស់កូនក្មេងដែលមានសរសៃទន់ល្អដុសឲ្យបានសព្វ ។ បន្ទាប់មកប្រើវ៉ាស៊ីលីនឈ្លីនោះ នឹងធ្វើឲ្យសាច់បបូរមាត់រលីងលែងរបកស្បែកតទៅទៀតមិនខាន ។
- **បបូរមាត់គ្មានស្នាមជ្រីវជ្រួញ** : គ្មានអ្វីពិបាកនោះទេ ដោយគ្រាន់តែព្យាយាមញញឹមទាញបបូរមាត់ឲ្យបានវែង រួចខាំធ្មេញឲ្យបានណែនក្នុងមួយថ្ងៃធ្វើឲ្យបាន២០ដងនោះ ស្នាមជ្រីវជ្រួញនៅលើបបូរមាត់ដែលជាសញ្ញានៃរូបភាពចាស់មុនវ័យពិតជាលែងមានតទៅទៀត ។
- **បបូរមាត់មានសាច់ទ្រលុកទ្រលន់** : ក្នុងនេះយើងគ្រាន់តែណែនាំឲ្យអ្នកប្រើខ្មៅដៃគូសទៅតាមទំរង់បបូរមាត់ឲ្យលេចចេញជារូបរាងរួចសង្កត់ពណ៌ឲ្យចាស់បន្តិចត្រង់បបូរមាត់ខាងក្រោមដោយប្រើខ្មៅដៃគូសពណ៌ត្នោតគាសឲ្យបានសព្វ ។ បន្ទាប់មកប្រើឧបករណ៍វាសពណ៌ពីតាមរឹមបបូរមាត់ឲ្យចុះមកពេញសាច់បបូរមាត់ ទើបចាប់ផ្តើមលាបក្រែមតាមធម្មតា ។ គ្រាន់តែអនុវត្តតាមការពោលណែនាំមកខាងលើនេះធានាថា សាច់បបូរមាត់របស់អ្នកពិតជាឡើងទ្រលុកទ្រលន់គួរឲ្យចង់បបោសអង្អែលបំផុត ៕

តមកពីទំព័រទី០៤

## តើ កឹម សុខា ជាតួឯកនយោបាយថ្មី...

តាមការសង្កេត ទោះបីចលនាប្រជាធិបតេយ្យ ដើម្បីការផ្លាស់ប្តូរត្រូវបានបង្កើតឡើងមានរយៈពេលជាងមួយឆ្នាំមកហើយក៏ដោយ ប៉ុន្តែគណបក្សទាំងពីរនៅមិនទាន់បង្កើតឱ្យមានយន្តការធ្វើការរួមគ្នានៅឡើយទេ ។

នៅក្នុងក្របខណ្ឌរដ្ឋសភាគណបក្សទាំងពីរមិនអាចបន្លឺសម្លេងតែមួយលើបញ្ហារួម ។ គណបក្សសិទ្ធិមនុស្សដែលមានតំណាងរាស្ត្រចំនួន3 រូបមិនទទួលបានឱកាសបញ្ចេញមតិ ឬយោបល់នៅក្នុងសម័យប្រជុំរដ្ឋសភាឡើយ ព្រោះគណបក្សនេះមិនអាចបង្កើតក្រុមតំណាងរាស្ត្រដោយខ្លួនឯង ។ បទបញ្ជាផ្ទៃក្នុងរដ្ឋសភាតម្រូវឱ្យមានតំណាងរាស្រចំនួន10រូប ទើបអាចបង្កើតក្រុមតំណាងរាស្ត្របានមួយ ។ រីឯគណបក្ស សម រង្ស៊ី ដែលមានតំណាងរាស្ត្រចំនួន26រូប អាចបង្កើតក្រុមតំណាងរាស្ត្របានពីរ ដែលទទួលបានសិទ្ធិឡើងនិយាយនៅក្នុងសម័យប្រជុំរដ្ឋសភា ។ ប៉ុន្តែគេនៅមិនទាន់ដឹងថា តើគណបក្ស សម រង្ស៊ី អាចផ្តល់សម្បទានដោយចែករំលែកពេលវេលាដែលខ្លួនមានដល់គណបក្សសិទ្ធិមនុស្សដើម្បីមានឱកាសឡើងបញ្ចេញមតិ ឬយោបល់នៅពេលប្រជុំសភាបានឬយ៉ាងណានោះទេ ? មន្ត្រីជាន់ខ្ពស់នៃគណបក្ស សម រង្ស៊ីធ្លាប់លើកឡើងថា គេពិបាកនឹងបែងចែកពេលវេលាដ៏តិចតួចរបស់គេឱ្យទៅគណបក្សសិទ្ធិមនុស្សណាស់ ហើយម្យ៉ាងវិញទៀតបទបញ្ជាផ្ទៃក្នុងរដ្ឋសភាទំនងជាមិនអនុញ្ញាតឱ្យធ្វើដូច្នេះបានដែរ ។

មជ្ឈដ្ឋានទូទៅនៅតែគិតថា គណបក្សទាំងពីរមិនអាចរួបរួមគ្នាបានឡើយ គេចង់ឃើញបក្សទាំងពីរចេះធ្វើការរួមគ្នា និងនិយាយភាសា ឬសារនយោបាយតែមួយមុនឈានដល់ការរួបរួមគ្នាជាផ្លូវការ ។

អ្នកជំនាញខាងគណបក្សនយោបាយបានលើកឡើងថា ការដឹកនាំធ្វើសកម្មភាពនយោបាយផ្សេងគ្នា និងសម្លេងមិនរួមគ្នាជាសញ្ញាបញ្ជាក់ថា គណបក្សទាំងពីរហាក់គ្មានចេតនាចង់រួបរួមគ្នាទេ ម្យ៉ាងវិញទៀតការដឹកនាំធ្វើសកម្មភាពនយោបាយរៀងៗខ្លួនដើម្បីអូសទាញប្រជាប្រិយភាព និងការគាំទ្រពីក្នុងចំណោមសមាជិកដែលចំណុចនេះអាចបង្កើតឱ្យមានសង្គ្រាមពាក្យសំដីដាក់គ្នាតាមរយៈការលើកមកបង្ហាញពីចំណុចខ្សោយ ឬកំហុសផ្សេងៗមកលាតត្រដាងជាសាធារណៈ។ ប្រការនេះនឹងធ្វើឱ្យគណបក្សទាំងពីរត្រូវខាតបង់ ព្រោះប្រជាពលរដ្ឋ និងបាត់បង់ជំនឿ ហើយអ្នកដេកចាំទទួលផលពីការប្រជែងគ្នានេះ គឺគណបក្សប្រជាជនកម្ពុជា ។

មេដឹកនាំនៃគណបក្សទាំងពីរសុទ្ធតែទទួលស្គាល់ថា ការមិនរួបរួមគ្នានឹងធ្វើឱ្យពួកគេចាញ់តទៅទៀត។ នេះជាតថភាពជាក់ស្តែងសម្រាប់បរិបទនយោបាយនៅកម្ពុជា ។ **"ការរួបរួមរវាងគណបក្សប្រជាធិបតេយ្យជាជម្រើសដ៏ល្អបំផុតសម្រាប់អ្នកបោះឆ្នោតកម្ពុជា ប៉ុន្តែដំណើរឆ្ពោះទៅរកការរួបរួមគ្នាស្ថិតនៅលើវិថីដ៏គ្រោះថ្នាក់បំផុត"** ។



លោក កឹម សុខា និង លោក សម រង្ស៊ី

នៅដំណាក់ការចុងក្រោយនេះដំណើរការរួបរួមគ្នារវាងគណបក្សទាំងពីរហាក់ដើរថយក្រោយដោយហេតុថា គណបក្ស សម រង្ស៊ី បាននិងកំពុងជួបប្រទះនឹងព្យុះភ្លៀងយ៉ាងខ្លាំង ព្រោះទាំង សម រង្ស៊ី និងតំណាងរាស្ត្រមួយចំនួន ព្រមទាំងកាសែតដែលគាំទ្រគាត់ត្រូវបានតុលាការឧបករណ៍របស់ ហ៊ុន សែន កាត់ទាសដាក់ពន្ធនាគារ ។ សម រង្ស៊ី ត្រូវបានបង្ខំចិត្តឱ្យរស់នៅនិរទេសក្រៅប្រទេស។ គណបក្ស សម រង្ស៊ី ត្រូវចំណាយធនធាន និងពេលវេលាច្រើនសម្រាប់តទល់ក្តីនៅតុលាការ និងការស្វែងរកដំណោះស្រាយនយោបាយសម្រាប់ការវិលត្រឡប់របស់ សម រង្ស៊ី មកកាន់មាតុប្រទេសវិញ ។ សម រង្ស៊ី និងគណបក្សរបស់គាត់បានធ្លាក់ចូលទៅក្នុងអន្ទាក់នយោបាយរបស់ ហ៊ុន សែន ព្រោះ ហ៊ុន សែន តែងតែបង្កើតរបៀបវារៈថ្មីៗសម្រាប់ឱ្យ សម រង្ស៊ី និងអ្នកនយោបាយផ្សេងទៀតអនុវត្ត និងប្រើប្រាស់ធនធាន និងពេលវេលារហូតខ្សត់ខ្សោយ ។ ជាក់ស្តែងចាប់តាំងពីក្រោយការបោះឆ្នោតសភាឆ្នាំ2008 គណបក្ស សម រង្ស៊ី បានចំណាយ ហើយបាននិងកំពុងចំណាយធនធាន និងពេលវេលាដើម្បីដោះស្រាយរបៀបវារៈរបស់ ហ៊ុន សែន ដាក់ឱ្យ ។ ប៉ុន្តែ សម រង្ស៊ី ក៏ត្រូវទទួលខុសខ្លួសផងដែរ ចំពោះកំហុសនយោបាយរបស់ខ្លួន ព្រោះ សម រង្ស៊ី ចូលចិត្តបង្កើតព្រឹត្តិការណ៍នយោបាយក្នុងគោលបំណងទាញយកនូវការចាប់អារម្មណ៍ពីសាធារណៈជនជាតិ និងអន្តរជាតិ ដូច្នេះការបង្កើតព្រឹត្តិការណ៍នយោបាយរបស់គាត់តែងតែធ្វើឱ្យគាត់ធ្លាក់ចូលទៅក្នុងអន្ទាក់របស់ ហ៊ុន សែន ដោយមិនដឹងខ្លួន ដោយសារការសម្រេចចិត្តជាលក្ខណៈអត្តាធិបតេយ្យរបស់គាត់ ។

ឆ្លៀតឱកាសដែល សម រង្ស៊ី និងគណបក្ស សម រង្ស៊ី កំពុងប្រឈមនឹងវិបត្តិនយោបាយទាំងខាងក្នុង និងខាងក្រៅដោយទុកចោលរបៀបវារៈស្តីពីការរួបរួមគ្នានៅដោយឡែក កឹម សុខា ក៏បានប្រើប្រាស់សង្គ្រាមចិត្តសាស្ត្រវាយបកមកលើ សម រង្ស៊ី ថាមិនព្រមបង្រួបបង្រួម ។ ឆ្លៀតពេលជាមួយគ្នា កឹម សុខា បានអំពាវនាវដល់សមាជិកនៃគណបក្ស សម រង្ស៊ី ឱ្យលះបង់ចោល សម រង្ស៊ី រួចមកចូលរួមជាមួយគណបក្សសិទ្ធិមនុស្សវិញ ។ នេះជាទង្វើមិនគួរគប្បីមួយរបស់ កឹម សុខា ព្រោះវាជាល្បិចត្រីងៀតឆ្លៀតពង ។ ទង្វើនេះត្រូវបានមើលឃើញថា កឹម សុខា មិនចង់បានការរួបរួមគ្នាទៀតទេ ព្រោះ កឹម សុខា អាចយល់ថា សម រង្ស៊ី មិនអាចវិលត្រឡប់មកកាន់មាតុប្រទេសវិញបាន ដូច្នេះទោះបីមិនរួបរួមគ្នាក៏គាត់អាចប្រមូលយកសមាជិកនៃគណបក្ស សម រង្ស៊ី បានដែរ។ ហើយថាគណបក្សសមរង្ស៊ី បើអត់ពីបុគ្គល សម រង្ស៊ី នឹងធ្វើឱ្យគណបក្សនេះ បែកបាក់ និងបាត់បង់នូវការគាំទ្រពីប្រជាពលរដ្ឋ ដូច្នេះ គាត់រង់ចាំត្រងយកសមាជិកពីគណបក្ស សម រង្ស៊ី វិញវាគ្រប់គ្រាន់ពេកហើយ។

នេះអាចក្លាយជាការពិត ព្រោះតាមរបត់នយោបាយបច្ចុប្បន្ន ហ៊ុន សែន បានរៀបចំស៊ីនណារីយ៉ូនយោបាយដើម្បីរារាំងការវិលត្រឡប់របស់ សម រង្ស៊ី មកដឹកនាំគណបក្ស សម រង្ស៊ី ។ ហើយវារិតតែគាប់ជួននឹងការសង្ស័យ និងការចោទប្រកាន់កន្លងមកថា កឹម សុខា ជាមនុស្សរបស់ ហ៊ុន សែន បង្កើតឡើងដើម្បីមកជំនួសតំណែងនយោបាយរបស់ សម រង្ស៊ី ។

វាជាកំហុសនយោបាយរបស់ សម រង្ស៊ី និងក្រុមប្រកាន់គោលជំហររឹងត្អឹងក្នុងគណបក្ស សម រង្ស៊ី នោះគឺក្រុមរបស់ អេង ឆៃអ៊ាង និង យឹម សុវណ្ណ ដែលបានបង្ហាញពីឥរិយាបថសោះអង្គើយចំពោះការរួបរួមគ្នា ដោយមិនបានធ្វើការឆ្លើយតបជាវិជ្ជមានចំពោះសំណើរបស់ កឹម សុខា រីឯ កឹម សុខា ក៏អស់ការអត់ធ្មត់រង់ចាំការឆ្លើយតបរបស់ សម រង្ស៊ី ដូច្នេះគាត់ត្រូវខិតខំពង្រឹងខ្លួនឯង និងឆ្លៀតឱកាសអវត្តមានរបស់ សម រង្ស៊ី គាត់ឆក់យកឱកាសនេះដើម្បីប្រមូលការគាំទ្រពីសមាជិកនៃគណបក្ស សម រង្ស៊ី ។

កាលពីដើមខែមិថុនា ឆ្នាំ2010 នេះ កឹម សុខា បានប្រាប់វិទ្យុខ្មែរប៉ុស្តិ៍ថា គាត់បានផ្ញើលិខិតទៅ សម រង្ស៊ី ស្នើសុំឱ្យមានការជួបប្រជុំគ្នា ដើម្បីពិភាក្សាអំពីការរួបរួមគ្នា ។ កឹម សុខា បានបន្ទន់ឥរិយាបថថា គាត់ទុកឱ្យ សម រង្ស៊ី ជ្រើសរើសទីកន្លែង និងកាលបរិច្ឆេទហើយគាត់សុខចិត្តធ្វើតាម សម រង្ស៊ី វិញ ។ នេះជាការបើកចំហដ៏ធំបំផុតពីសំណាក់ កឹម សុខា ដូច្នេះគេរង់ចាំមើលឥរិយាបថរបស់ សម រង្ស៊ី វិញថាតើគាត់នៅមានសុឆន្ទៈលើការបង្រួបបង្រួមគ្នាដែរឬទេ ? បើសិន សម រង្ស៊ី នៅតែមិនឆ្លើយតបចំពោះសំណើរបស់ កឹម សុខា ទេនោះ នោះ សម រង្ស៊ី ទំនងជាអស់ការចាប់អារម្មណ៍លើការរួបរួមគ្នាទៀតហើយ ។

រីឯ កឹម សុខា វិញ ចាត់ទុកថា សំណើររបស់គាត់លើកនេះជាលើកចុងក្រោយ ហើយគាត់ទំនងជាមិនអាចរង់ចាំ សម រង្ស៊ី តទៅទៀតបាននោះទេ ពីព្រោះពេលវេលាមិនអនុញ្ញាត ។ នៅសល់រយៈពេលមិនដល់2ឆ្នាំទេ នោះការបោះឆ្នោតជ្រើសរើសសមាជិកក្រុមប្រឹក្សាឃុំ/សង្កាត់ ឆ្នាំ2012 និងការបោះឆ្នោតជ្រើសតាំងសមាជិកតំណាងរាស្ត្រឆ្នាំ2013 នឹងចូលមកដល់ ។ ចំណែកការរួបរួមគ្នាវិញត្រូវការពេលវេលាច្រើន ដើម្បីរៀបចំយុទ្ធសាស្ត្រផ្សេងៗ និងការទទួលស្គាល់តាមផ្លូវច្បាប់ ។ ទោះជាយ៉ាងនេះក្តីពេលវេលាក៏មិនត្រូវយូរពេក ឬកៀកពេក បើមិនដូច្នោះទេវាប្រៀបដូចជាការដាស់គោឱ្យក្រោកស៊ីស្មៅនៅពាក់កណ្តាលយប់អញ្ចឹងដែរ ។

# ភោជនីយដ្ឋានខ្មែរ

# Kavei

## CAMBODIAN RESTAURANT

Authentic Khmer • Thai • Lao • Vietnamese Phở



សម្លការី នំបុ័ង

**320 W OREGON AVENUE**
**(OREGON MARKET, SOUTH PHILLY)**

**OPEN 7 DAYS A WEEK**
**9am-10pm**




## 215.952.6688